សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947




Vol 07 Issue 147 - Feb 7th - Feb 20th, 2014

# កាសែតខ្មែរផុស និងឡូវែល

**ដោយ : រីឆាយ ហូវ , ប្រែសម្រួលដោយ សុខា**

សារព័តិមានខ្មែរផុស ស.រ.អា ជាផ្នែកមួយនៃសារព័តិមានជាតិពន្ធក្នុងក្រុងឡូវែល និងទូទាំងសហរដ្ឋអាមេរិក ។ សារព័តិមានខ្មែរផុស ក៏បានគេស្គាល់ថា ជាសារព័តិមានប្រើ **តទៅទំព័រទី ១១**

## The Ethnic Press and Lowell

**By Richard P. Howe Jr.**

The Khmer Post USA is part of a great tradition of the ethnic press in Lowell and throughout the United States. Also known as the foreign language press, the ethnic press describes newspapers published for specific audiences based on language, nationality or religion. The ethnic press in America began at the time of the (**Continued to Page 11**)


Richard Howe Jr.

# អភិបាលរដ្ឋម៉ាសាឈូសេត ផាទ្រិក ធ្វើទស្សនកិច្ចមកកាន់ឡូវែល

**សូមអាននៅទំព័រ ២៥**

## Governor Patrick touts entrepreneurship, Sandbox, in visit to Lowell

(**Continued to Page 25**)




ឌីវ៉ល់ ផាទ្រិក

វិភាគនយោបាយ

# ហេតុអ្វីក៏គណបក្សសង្គ្រោះជាតិហក់ចាប់ដៃចិន?

**ដោយ : ពិនសំខុន**

កាលពីខែមុនយើងបានតាំងសំនួរថា "ហេតុអ្វីក៏ សម រង្ស៊ី ចង់សម្លាប់ជីវិតនយោបាយខ្លួនដោយហក់ទៅយកចិនជាសម្ពន្ធមិត្ត" ។ គណបក្សសង្គ្រោះជាតិមិនបានខ្វល់នឹងយកពេលឆ្លើយនឹងសំនួរនេះនៅឡើយទេ តែយើងសូមដកស្រង់លើកយករំលឹកព្រឹត្តិការណ៍នយោបាយក្រៅប្រទេសកម្ពុជារបស់លោកឪពុកប៉ុងស្លូ អ្នកនិពន្ធសៀវភៅ"ឆ្នាំសូន្យ" ដើម្បីជាពន្លឺសម្រាប់យល់បានខ្លះៗពីនយោបាយដែលជាកង្វល់ប្រជាពលរដ្ឋខ្មែរ ចំពោះមាតុភូមិរបស់ខ្លួន ។



***ថ្ងៃទី៤ធ្នូ២០១៣ :** ហ៊ុន សែន បានសុំឱ្យចិននឹងជប៉ុនប្រើការអត់ធ្មត់ក្នុងការដោះស្រាយទំនាស់ស្តីពីបង្រ្ជុំកោះ **តទៅទំព័រទី ១៨**

# ក្លឹបសារព័ត៌មានខ្មែរផុស


អ៊ីលៀត វ៉ានី ចៅហ្វាយក្រុងឡូវែលថ្លែងនិយាយនៅប្រេសក្លឹប

**ដោយ : រីឆាត ហូវ**

**ប្រែសម្រួលជាខេមរភាសាដោយ : សុខា**

រ៉ិច ចី និង សុបិន ពិន ដំបូងឡើយបោះពុម្ពសារព័តិមាននៅទីក្រុងហ្វីឡាដែលហ្វៀរដ្ឋជិនស៊ុលវេញ៉ា មុននឹងផ្លាស់មករស់នៅឡូវែលប្រហែលជាង១ឆ្នាំ ។

នៅហ្វីឡាដែលហ្វៀអ្នកទាំងពីរតែងទម្លាប់បង្កើតកម្មវិធីប្រមូលផ្តុំជួបជុំសមាជិកក្នុងសហគមន៍នៃតំបន់ដែលមានប្រជាជនខ្មែររស់នៅ និងមានមន្ត្រីបម្រើការងារពីរដ្ឋមកចូលរួមពិភាក្សាផ្តល់យោបល់ពីបញ្ហាផ្សេងៗដែលចោទឡើងក្នុងសហគមន៍ ។ រ៉ិចចី (សំខុន)និងសុបិន្ត បច្ចុប្បន្នកំពុងយកទម្លាប់មួយនេះមកអនុវត្តនៅឡូវែល ។ អ្នកទាំងពីរបានបង្កើតឱ្យមានកម្មវិធីក្លឹបសារព័តិមានលើកទីមួយសម្រាប់ឆ្នាំ២០១៤ នៅឡូវែលនាថ្ងៃទី ៣១ មករា ២០១៤ នៅឯភោជនីយដ្ឋានទេពធីតា ខ្មែរ លើផ្លូវ ឈីម សូដ ។

**តទៅទំព័រទី ១៦**




The Cambodian-American Biweekly Newspaper
សារព័ត៌មានខ្មែរ-អាមេរិក ចេញពីរសប្តាហ៍ម្តង

a free local newspaper reaching over 20,000 Cambodian readers in the Greater Lowell area every two weeks

ផ្តល់ជូនកាសែតឥតគិតថ្លៃដល់អ្នកអានខ្មែរច្រើនជាង២០០០០នាក់នៅតំបន់ឡូវែលរាល់ពីសប្តាហ៍ម្តង

Soben Pin, Managing Partner អ្នកគ្រប់គ្រង សុបិន្ត ពិន

978.677.7163 (Office) 978. 656.8141 (Mobile)

សូមកក់ពាណិជ្ជកម្មអ្នកជាមួយយើងខ្ញុំ ហើយទទួលបានការបញ្ចុះតម្លៃ២០%

Reserve Your 2014 Ads with us today and receive up to 20% OFF!

(Please mention this coupon ad: Winter2013)

## Sample of our affordable pricing បញ្ជីតម្លៃពាណិជ្ជកម្មក្នុងតម្លៃសមរម្យ

| ទំហំទំព័រ Page Size | ប្រវែង Length x Width | 1ខែ 1 month | 3 ខែ 3 months 10%OFF | 6 ខែ 6 months 15%OFF | 12 ខែ 12 months 20%OFF |
|---|---|---|---|---|---|
| 1/2 page color | (6.5"x10") | $484 | $440/m | $411/m | $387/m |
| 1/4 page color | (6.5"x5") | $264 | $240/m | $224/m | $211/m |
| 1/4 Classify Ad | (6.5"x5") | $160 | | | |
| 1/8 Classify ad | (3.25"x5") | $100 | | | |
| Business Card | | $50 | | | |

## Our 2014 Publishing Dates កាលវិភាគបោះពុម្ព

| | |
|---|---|
| January 10th & 24th | July 11th & 25th |
| February 7th & 21st | Augus 8th & 22nd |
| March 7th & 21st | September 5th & 19th |
| April 4th & 25th | October 10th & 24th |
| May 9th & 23rd | November 7th & 21st |
| June 6th & 20th | December 5th & 19th |

*all ad materials are due one week prior to publishing date.
រាល់គំរូពាណិជ្ជកម្មត្រូវបញ្ជូន1សប្តាហ៍មុនចូលរោងពុម្ព




## Call or Visit our Sales Office

45 Merrimack Street. Suite 218A. Lowell, MA 01852
Tel: 978.677.7163. Cell: 978. 656.8141 Fax: 978.677.7092
Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com
www.khmerpost.us | www.facebook.com/KhmerPostUSA

# ដំណើរតាមជើងសមុទ្រ"អាត់ឡង់ទិក" ភាគ៤ចប់

ដោយ : ពិនសំខុន

ថ្ងៃទី៤នៃដំណើរលើមហានាវាទេសចរដ៏ធំនឹងចេញក្រោយគេបង្អស់នេះ កំពុងនាំដំណើរយើងឆ្ពោះទៅទិសខាងកើតស.រ.អា. សំដៅទៅកោះ"បាហាមាស"។ ក្នុងដំណើរពេញ១ថ្ងៃនៅលើនាវា"ន័រវេស៊ាន"យើងឆ្លងកាត់មហាសមុទ្រ"អាត់ឡង់ទិក"ដ៏ស្ងប់ស្ងាត់ ព្រះអាទិត្យបញ្ចេញរស្មីយ៉ាងក្តៅផ្តល់សេចក្តីរីករាយដល់គ្រប់ភ្ញៀវយ៉ាងគាប់ចិត្តជាហេតុធ្វើឱ្យមនុស្សម្នាចេញទៅរកអាងហែលទឹក ទៅរកសួនទឹករាំកន្លែងហាត់ប្រាណកន្លែងដេកសំងិលហាលរស្មីសុរិយាពាសពេញកំពូលនាវា។ ខ្ញុំជាមួយប៉ុណ្ណារ៉ូនាំគ្នាទៅសំដឹលខាងមុខបង្អស់នៃនាវាតាំងពីព្រលឹមអរុសម្លឹងច្រមុះដែកជ្រែកសមុទ្រ"អាត់ឡង់ទិក"យ៉ាងយឺត១តែគ្មានរួញរាខ្ញុំបាននឹកទៅដល់ប្រវត្តសម័យសង្គ្រាមលោកលើកទី១ នឹងលើកទី២ ដែលនៅកន្លែងដែលយើងកំពង់ឈរនេះហើយ គេហៅថា ត្រីកោន"ប៊ែមូដា" ជាតំបន់ជើងកបដ៏គួរឱ្យភ័យខ្លាចជាទីបំផុតនៃមហាសាគរ"អាតឡង់ទិក" ដោយសារទឹកគួចនាវាចម្បាំង គួចអ្នកដំណើរដែលហ៊ានឆ្លងកាត់គួចទាំងយន្តហោះប្រតិបត្តិការណ៍សឹកយកទាំងភ្នែកស្រស់បាត់ជាច្រើនឆ្នាំរកមិនឃើញឡើយ អាថកំបាំងនេះបានធ្វើឱ្យនាវិកសមុទ្រខ្លាចរអារយ៉ាងខ្លាំង ។ តែដោយសារបច្ចេកវិជ្ជាទំនើបបំផុតអាថិកំបាំងនៃត្រីកោន"ប៊ែមូដា"បានត្រូវគេស្រាយឃើញចំឡើយអស់ហើយ នៃពេលថ្មី១នេះ។ ខ្ញុំមានការព្រួយបារម្ភមួយភ្លែតដែរ តែរំភើបក្នុងចិត្តណាស់

តទៅទំព័រទី ២០

សមាគមខ្មែរ

## Cambodian Mutual Assistance Association

of Greater Lowell, Inc.

120 Cross Street, Lowell, Massachusetts 01854

Tel: (978) 454-6200 Fax: (978) 454-6229

**Executive Director at the Cambodian Mutual Assistance Association, Lowell, MA**

Founded in 1984, the Cambodian Mutual Assistance Association (CMAA) a non-profit, 501c(3) organization based in Lowell, MA is dedicated to improving the quality of life for Cambodian Americans and other minorities and economically disadvantaged persons in Lowell through educational, cultural, economic and social programs.

Since its inception the organization has helped thousands of Cambodians through resettlement, education, translation and adjustment services. In the past, the CMAA has helped many Cambodians adjust and to become acclimated in the Lowell area. Today, the CMAA is focused on advocating and empowering the Khmer population by introducing health literacy, financial literacy and other strategic programs that help preserve Cambodian's unique rich culture while enhancing their American identities. Many of the CMAA programs are funded through public grants and private donors.

The Executive Director is tasked with growing the CMAA beyond its history and into an organization that is nimble and agile with a focus on community based partnerships while maintaining the high level of service to our community members.

**Job Summary and Candidate Profile**

Reporting to the Board of Directors, the Executive Director is the primary officer responsible for the day-to-day operations of our Lowell based offices and program space, strategic program development, fund development and community relations functions within Lowell and the greater Lowell area. The ideal candidate will have a strong commitment to working for a purpose driven organization that is challenged by decreased government funding and increased public demand for services.

**Responsibilities**

- Recruitment, employment and release of all personnel, both paid staff and volunteers. Effectively manages the organization according to authorized personnel policies and procedures that fully conform to the current applicable laws and regulations.
- Supports and provides team leadership for staff through resource planning, work assignment, information exchange, and setting project goals.
- Secures and evaluates additional resources to support the CMAA Programs including grant writing, fundraising, and fee for service contracting. Manage fee-for-service processes including proposal development, marketing, and project completion. Identifies potential donors, cultivates relationships and solicits donations for the organization.
- Works with the Finance Committee to prepare an annual budget, ensures that the organization operates within budget guidelines, identifies potential areas of concern and creates plans to mitigate risks of overages.
- Works with the President to plan the agenda for the monthly Board meetings and also the weekly email updates to the Board regarding current successes and/or concerns. Attends monthly Board meetings and updates the Board on the condition of the organization. Assists in the development of marketing materials and promotion of the CMAA brand with support from the marketing sub-committee of the board of directors.
- Ensures compliance with local, state and federal regulations with particular emphasis on those regulations regarding non-profits.
- Represents CMAA on selected task forces and committees to promote the mission of the organization.
- Works with community members to promote the CMAA Program via radio, television and community workshops, and participates in community events.
- Reviews and analyzes organizational operations to evaluate the performance of the organization and to identify areas of potential program modifications and improvements. Recommend timelines and resources needed to achieve the strategic goals.
- Maintains current programs and develops new programs to further increase the CMAA organizational and strategic objectives.

**Qualifications**

- Visionary and strategic leadership to inspire belief in the mission of the CMAA within the community.
- Understanding of community economic development and belief in its ability to improve the quality of life for low income people and disadvantaged communities.
- Working knowledge of nonprofit finance, human resources, resource development, community organizing, and neighborhood planning.
- High level understanding of community economic development funding and financing resources.
- Excellent verbal and written communication skills.
- Knowledge of local, state, and federal laws and regulations; of business and management principles involved in strategic planning, resource allocation, and leadership techniques; of accounting, budgeting and financial principles; and of the principles and practices of public administration and management.
- Bachelor's degree in a relevant field and a minimum of 4 years of experience with community development, grant writing, fundraising, and nonprofit management including supervisory experience.

Classification: Exempt, Full Time, Permanent

Salary commensurate with experience

If you are interested in applying for this position, please submit your cover letter, resume, and salary expectation to info@cmaalowell.org




ថ្ងៃនេះខ្ញុំសូមលើកពីការសន្សំលុយតក់ៗ ដើម្បីឱ្យអាចក្លាយជាអ្នកមានម្នាក់ទៅថ្ងៃក្រោយបាន ។ គឺជាអត្ថបទសេដ្ឋកិច្ចគ្រួសារដែលនៅ ស.រ.អា.នេះគេអនុវត្តន៍គ្រប់គ្នា ប៉ុន្តែទ្រឹស្តីលុយសន្សំនេះមិនជាទីទម្លាប់ផ្តោតអារម្មណ៍សំខាន់សំរាប់គ្រួសារខ្មែរជាទូទៅនៅឡើយទេ ប៉ុន្តែក៏មិនមាននរណាម្នាក់មិនបន់ស្រន់ឱ្យ "មានបាន" នោះដែរ។ នៅគ្រប់ពេលអុចធូបបន់ស្រន់ ឬឱ្យពរគ្នាម្តងៗពាក្យ "...សុំឱ្យជួបតែសម្បកសម្បត្តិមានបានកុំបីខានឡើយ..." តែពាក្យនេះពុំបានជាមេរៀន ឬជាមាតិកានៃដំណើរជីវិតបន្តិចណាទេ ។ តើធ្វើដូម្តេចទើបក្លាយទៅជាអ្នកមានទៅបាន គឺទាល់តែសន្សំម្តងបន្តិចដោយព្យាយាម ទើបសម្បត្តិនោះកើតហើយពូនជាសម្បត្តិច្រើនបាន ។ យើងបានអានសៀវភៅស្តីពី "អ្នកមានលុយវាល់លាន" មួយចំនួនហើយក៏នឹកដល់អ្នកអានយើងដែលពុំមានវាសនានិងឮការពន្យល់ពីលោកអ្នកមានទាំងឡាយរបស់ជាតិខ្លួនដូច្នេះក៏សរសេរសម្រាយអត្ថន័យចែកចាយជូនជាសណ្តាប់ដូចតទៅ ។ អ្នកដែលហៅថា "មាន" ប្រាក់វាល់លាននៅស្រុកអាមេរិកនេះ មានច្រើនជាង៥ភាគរយនៃប្រជាជនទាំងមូល ហើយស្ទើរតែទាំងអស់ពុំមែន "មាន" ដោយចៃដន្យនោះទេ ម្យ៉ាងទៀតប្រាក់នោះក៏មិនមែនមានប្រភពអាថ៌កំបាំងនោះទេគេថា "នរណាក៏អាចក្លាយជាអ្នកមានបានដែរ" ។

ក្លាយទៅជាអ្នកមានដំបូងបង្អស់ គឺ: ១-ចំណង់ ហើយប្រាថ្នាឱ្យទៅជាអ្នកមានម្នាក់ ២-រៀបខ្លួននឹងចរិយាដើម្បីឱ្យសម្បត្តនោះជ្រាបចូលមកនៅបាន ៣-សម្បត្តិនោះចូលមកហើយធ្វើឱ្យវាបង្កើតកូនដោយខ្លួនវា ៤-កិច្ចការពារកុំឱ្យសម្បត្តិនោះចេញទៅវិញដោយខ្ជះខ្ជាយ ៥-រក្សាសីលធម៌ជាគោលការណ៍ប្រចាំជីវិត ៦-អនាគតគ្រួសារ គឺជាគោលដៅប្រចាំជីវិត ។ ទាំងនេះជាដំណើរជីវិតសង្ខេបនៃអ្នកមាន តើគេត្រូវយល់ពីអារម្មណ៍នោះយ៉ាងណា?

១-ចំណង់ក្លាយជាអ្នកមាន គឺគិតថា "រស់ជាអ្នកក្រមានន័យថា ខ្វះខាតជាប្រចាំការខ្វះខាតនេះនឹងនាំឱ្យគំនិតសុញ ធ្វើអ្វីមិនបានសម្រេច ផ្ទះសម្បែងក៏ពិបាករស់ទំនាក់ទំនងអ្នកនៅជុំវិញ ក៏មិនស្មើមុខ រីឯគ្រួសារដែលខ្វះមុខខ្វះក្រោយច្រើនគ្មានសេចក្តីសុខរាប់ទាំងមិនអាចការពារសុខភាពបានទៀតផង..." ដូច្នេះត្រូវតែគិតប្រាថ្នាចាប់យកជីវិតគ្រប់គ្រាន់ ឬលើសពីគ្រប់គ្រាន់ឱ្យខាងតែបាន ដើម្បីឱ្យការគិតទៅមុខមានភាពភ្លឺថ្លាវាងវៃអាចនឹងមិនពឹងពាក់អ្នកជិតខាងក៏បាន



ពេលនោះភាពគ្រប់គ្រាន់ក៏អាចនាំឱ្យក្លាយជាថ្នាក់ដឹកនាំមានកេរ្តិ៍ឈ្មោះមានការគោរពកោតសរសើរពីក្រុមគ្រួសារនឹងពីក្នុងសង្គមបាន ។ រឿងព្រេងតម្រាខ្មែរជាច្រើនផ្តល់គម្រូនៃ "អ្នកមាន" ថា ជារឿងអច្ឆរិយ ដូចជាចៅស្រទបចេកបានក្លាយជាស្តេចលែងមានការខ្វះខាតអ្វីទៀតជាដើម តែតួសេដ្ឋីជាច្រើនមានបានដោយខំប្រឹងប្រែងផ្ទាល់ខ្លួនមែន មានដីមានផ្ទះ មានបរិវារាប់រយ តែពុំមានសម្រាយថាបានធ្វើយ៉ាងណាទើបមាននោះទេ ។ នៅគ្រប់តម្រាថ្មីទាំងអស់សេចក្តីបំណងជាអ្នកមាននេះនឹងបានដល់ទីសម្រេច លុះត្រាណាតែមាន "ចិត្តជាអ្នកមាន" ជាមុនមានសេចក្តីប្រាថ្នាដ៏មោះមុតសម្លឹងទៅអនាគតបោះជំហានប្រកបដោយក្តីសង្ឃឹមឆ្ពោះទៅទីដៅនោះដោយមិនរួញរា ។ យើងខិតខំរៀនសូត្រឱ្យបានពូកែរឱ្យបានថ្នាក់ខ្ពស់ គឺតស៊ូអត់ទ្រាំច្រើនឆ្នាំ ក៏ព្រោះតែប្រាថ្នាឱ្យប្រាជ្ញាវាងវៃចំណេះអាចប្រកបកាងារធំខ្ពង់ខ្ពស់ឱ្យមានជីវភាពប្រសើរលែងស្គាល់ក្រ ។ នៅមានការអប់រំតាំងពីកុមារភាពទៀតគឺទម្លាប់ឱ្យមានគំនិតច្បាស់លាស់មានស្មារតីសុច្ចរិតទម្លាប់ឱ្យចាយលុយតិចជាងលុយរកបានជាដំរាប ។

មានបំណងហើយ មិនទាន់គ្រប់គ្រាន់នៅឡើយទេ នៅមានលក្ខខណ្ឌផ្សេងទៀតផ្គួបគ្នាទើបសម្រេចបំណងបាន ។ លេខក្រោយយើងនឹងលើកយកគំនិតដែលត្រូវរៀបចំខ្លួននឹងចរិយាយ៉ាងណា ដើម្បីឱ្យសម្បត្តហូរចូលជាបន្តទៅទៀត ៕

តទៅលេខក្រោយ

## ព័ត៌មានខ្លីៗ-Short news

# ១_វិបត្តិនៅវត្តសុរិយារង្សី ហើឡាដែលហៀរ :

វត្តសុរិយារង្សីហៅ"វត្តកម្ពុជាក្រោម"កំពុងបន្តវិបត្តយ៉ាងក្រៀមក្រមរបស់ខ្លួនយ៉ាងគួរឱ្យសោកស្តាយ ។ សមាជិកជើងវត្ត៦នាក់ឈ្មោះ វ៉ូង ហាង - ឡាំ គួល - ជុំ សុន - លួ សុន នឹង សេនាផៃ ថាច់ បានដាក់ពាក្យប្តឹងកាលពីខែមិថុនា២០១៣ ចំពោះគណកម្មកាជាប់ឆ្នោតវត្តសុរិយារង្សីដែលមានឈ្មោះ ជីណា គីម - គ្រីស្តហ្វ័រ ង៉ោ - ជា ហាន -សាង ង៉ោ នឹង អនឌី ថាច់ ថា **ទី១**-ទាមទារសុំហាមមិនឱ្យចុងចោទចូលជិតវត្តតែចៅក្រមមិនយល់ព្រម **ទី២**-ទាមទារមិនឱ្យធ្វើសកម្មភាពក្នុងនាមជាគណកម្មការវត្ត **ទី៣**-ទាមទារឱ្យបោះឆ្នោតគណកម្មការសាជាថ្មីក្នុងរយៈពេល ៣០ថ្ងៃ ចៅក្រមបានយល់ព្រមជាបណ្តោះអាសន្ន រង់ចាំកិច្ចសិក្សាករណីបន្ថែម ។ មកដល់ថ្ងៃ២៦ខែធ្នូ២០១៣ ដីការសម្រេចមួយទៀត បាន "បដិសេធជាស្ថាពរនូវការទាមទារទី២ នឹង **ទី៣**"ថែមទៀត ។

គួររំលឹកថា គណកម្មការវត្តកម្ពុជាក្រោមថ្មីថ្មោងបានទទួលការចោទប្រកាន់ពីក្រុមខ្មែរកម្ពុជាក្រោមមួយក្រុមទៀតថា "ជាអាយ៉ងបំរើយួន"ក្រុមនោះនាំគ្នាគាំទ្រព្រះសង្ឃ២អង្គដែលទើបមកគង់នៅក្នុងវត្តសុរិយារង្សីហើយបានដាក់ "អាឡាម"មិនឱ្យគណកម្មការថ្មីនោះចូលក្នុងវត្តបានទេ -បន្ទាប់ពីចៅក្រមមិនព្រមដាក់បំរាមនាខែមិថុនាហើយអនុញ្ញាត្តិឱ្យទាំងអស់គ្នាប្រើប្រាស់វត្តបានទាំងអស់គ្នា ក៏ចេញចូលវត្តបានវិញ តែដំណឹងបានលេចឮថា "អ្នកដើមបណ្តឹងបានឈ្នះហើយ ដែលជាហេតុធ្វើឱ្យមានចេញអត្ថបទទស្សនមតិមិនច្បាស់លាស់មួយក្នុងខ្មែរផុសរបស់លោក



គ្រីស្តហ័រ ង៉ោ ប្រធានថ្មី
មិនទាន់បានចូលធ្វើការឱ្យវត្តនៅឡើយទេ



ភិក្ខុ យេង តួន ភិក្ខុ អៀង ភីរុណ
ទើបនឹងគង់នៅវត្តសូរិយារង្សី បាន២ឆ្នាំ ហើយវត្តនេះមានរឿងប្តឹងផ្តល់គ្នារហូត

គីម ភៀន នៅពេលដែលលោកទទួលព័ត៌មានតាមរយៈព្រះសង្ឃទាំង២អង្គនោះមក"។ យើងក៏បានទទួលដំណឹងពីអ្នកធ្លាប់គាំទ្រវត្តមកដែរថា "វិបត្តិនៅវត្តកម្ពុជាក្រោមនេះបានធ្វើឱ្យយាយតាជើងវត្តខកចិត្តច្រើន ហើយគ្មានបំណងត្រឡប់មកធ្វើបុណ្យនៅវត្តនេះវិញទេ"។

ដីការសម្រេចរបស់ចៅក្រមពីថ្ងៃទី២៦ធ្នូ នេះបានផ្តល់សិទ្ធពេញលេញតាមលក្ខន្តិកៈឱ្យគណកម្មការវត្តធ្វើការវិញបានហើយ ប្រសិនបើគ្មានឡើងទៅសាលាឧទ្ធរបន្តរទៀតទេ ក៏ជាការប្រសើរទី១ហើយ តែនៅទៅប្រមូលចាស់ទុំនឹងក្រុមទំនាស់គ្នាឱ្យមកជួបជុំគ្នាដូចដើមវិញ ទើបប្រសើរពិតប្រាកដតែតាមមើលទៅមិនមែនជាការងាយទេពីព្រោះ១ឆ្នាំកន្លងមកហើយនេះវត្តថ្មីមួយទៀតដែលនៅមិនឆ្ងាយប៉ុន្មានពីគ្នាបានយកភ្ញៀវអស់ទៅហើយ ។ ព័ត៌មានចុងក្រោយបង្អស់ដែលយើងទទួលបាន គឺ"ក្រុមអ្នកដើមចោទដដែលបានបន្តប្តឹងទៅឧទ្ធរទៀតរួចហើយ" ដូច្នេះពាក្យប្រសើរទី១ត្រូវបានត្រឡប់ក្រោយមកលេខសូន្យវិញ ជាពិន្ទុដែលគេធ្លាប់ឱ្យថ្នាក់ដឹកនាំសហគមន៍ខ្មែរដែលគិតពីមុខមាត់ខ្លួនឯង ខ្លាំងជាងគតិច្បាប់ដែលចេញពីអាជ្ញាកណ្តាលមួយដែលជាក្រសួងយុត្តិធមិរបស់សហរដ្ឋអាមេរិក ។

តទៅទំព័រទី ១៥

# កម្មវិធីដេញថ្លៃ សម្រាប់អ្នកមិនទាន់មានគូរគ្រង

**ដោយ : ចេម អសទីស**
**ប្រែសម្រួលដោយ : សុខា**

ថ្ងៃបុណ្យនៃសេចក្តីស្រឡាញ់កាន់តែកៀក! ប្រហែលជាគ្មានអ្វីដែលសំខាន់ជាងការណាត់ជួបគូរបស់ខ្លួននោះទេ!

ក៏មិនមែនថា មិនមានអ្វីប្លែកទាំងស្រុងដែរ ។ កម្មវិធីមួយឱ្យឈ្មោះថា កម្មវិធីដេញថ្លៃសម្រាប់អ្នកមិនទាន់មានគូគ្រងបានប្រមូលផ្តុំអ្នកចូលរួមដែលសុទ្ធតែមិនទាន់មានម្ចាស់ចិត្តរាប់ទាំងអ្នកជំនួញ សិស្ស និស្សិត អ្នកបម្រើការងារសង្គម អ្នកសារព័ត៌មាន គ្រូបង្រៀន អតីតនាវិក អ្នកគូសប្លង់ និងអ្នកចូលរួមជាច្រើនទៀត បានមកសប្បាយក្នុងកម្មវិធីដេញថ្លៃមួយដែលរៀបចំឡើងដោយ ឃូល ឬអង្គការរៀបចំកម្មវិធីវប្បធម៌ឡូវែល ក្នុងនោះមានលោក អេនឌី ចេកុបសិន ជាម្ចាស់ហាងកាហ្វេអេវេកខិននឹងទទួលរៀបចំកម្មវិធីនោះផ្ទាល់ ។

អ្នកឈ្នះក្នុងការដេញថ្លៃដែលបានឱ្យតម្លៃថ្លៃជាងគេក្នុងកម្មវិធីគឺទឹកប្រាក់៥៥០ដុល្លារ មានឈ្មោះថា ចេស៊ី ដឺរ៉ូសា ។ កម្មវិធីដេញថ្លៃឈានដល់ទឹកប្រាក់២៨០០ដុល្លារជារួម ។

គួរបញ្ជាក់ផងដែរនាយប់នោះ អ្នកចូលរួមសរុបមានប្រមាណជា១២៥នាក់ ដែលអញ្ជើញមកពីអង្គការ និងជំនួញនានាចំនួន១៨កន្លែង ។

កម្មវិធីប្រព្រឹត្តទៅដោយរីករាយមានតន្ត្រីការសម្តែងផ្ទាល់ពីខាងផ្នែកសិល្បៈផ្សេងៗក្នុងនោះមានក្រុមរបាំអង្គរផងដែរ ៕









# Singles Auction Fetches $2800 for Arts and Culture in Lowell

**By James Ostis**

With Valentine's Day right around the corner, what could be better than finding a date? How about finding a date while raising money for a great cause! That was the goal for the participants in the first ever Singles Auction Fundraiser for the Cultural Organization of Lowell (COOL) as it raised over $2800 in support of Lowell's art and cultural community at the Old Court Pub on February 1st.

The evening featured 14 eligible singles from all walks of life: a social worker, a police officer, teacher, ex-navy officer, graphic designer, students and others. In addition to those who braved the auction block, the night's festivities also included performances by local artists including Johannah Zacharer, Ricky Orng of Free Verse!, Angkor Dance Troupe, and The Party Band. 18 businesses, organizations, and individuals also supported the event through donations. All told, over 125 people attended the auction.

The event was organized by COOL board member and owner of Brew'd Awakening Coffeehaus, Andy Jacobson who also even entered the auction himself to bring in some more cash. The highest bid went to Jaci DeRosa of Eyeful Beauty who raised $550 for the evening's cause.

The Cultural Organization of Lowell was founded in 2001 with the mission to foster engagement in arts and culture and increase the visibility and vitality of Lowell's creative community. To learn more about COOL and sign up for information on arts and cultural events in Lowell, please visit www.cultureiscool.org

# អែលម៉ូ តារាតុក្កតាមកជួបកុមារឡូវែល

**ដោយ : សុខា**

ចុងសប្តាហ៍ផ្តើមពីថ្ងៃទី២៥ មករាឆ្នាំ២០១៤សាលអនុស្សាវរីយ៍ឡូវែលបានក្លាយជាទីតាំងសម្តែងការបង្ហាញដោយផ្ទាល់នូវឈុតឆាក អែល ម៉ូ អមដោយបទចម្រៀងភ្លើងតុបតែងស្អាតល្អត្រជាក់ភ្នែក និងរូបតុក្កតាគួរឱ្យស្រឡាញ់ពណ៌ចម្រុះ ដោយពណ៌ក្រហមមានឈ្មោះថា អែល ម៉ូ ពណ៌លឿងសម្រាប់តួអង្គបក្សី និងពណ៌ផ្សេងៗ ទៀតមានខៀវស្វាយ ឈាមជ្រូក សម្រាប់តួអង្គមេអំបៅ និងតួអង្គជាច្រើនទៀត។ ក្នុងនោះក៏មានតួមនុស្ស




លេងអមការសម្តែងផងដែរ។

មានបទចម្រៀងពិរោះៗ សម្រាប់កុមារជាច្រើនដែលទស្សនិកជនទាំងឪពុកម្តាយ និងកូនៗអាចច្រៀងតាមអ្នកសម្តែងរួមមានបទចម្រៀង អេ ប៊ី ស៊ី បទចម្រៀងរាប់លេខ ១ ២ ៣ ៤ ៥ ៦ ៧ ៨ និងបទចម្រៀងចែករំលែកតន្ត្រីសម្រាប់គ្រប់គ្នា I love to share music with every-one! ។

ក្នុងការសម្តែងទាំងមូលមានពីរវគ្គដោយ វគ្គទី១ ត្រូវផ្តល់ដល់ទស្សនិកជននូវ



ការសម្រាក១០ទៅ១៥នាទី មុនឈានចូលដល់វគ្គទី២។ ក្នុងវគ្គសម្រាកនោះផ្ទាល់មានការលក់រូបប៉េងប៉ោង អែលម៉ូ និងតុក្កតាសម្រាប់ក្មេងៗជាច្រើន។ ជាមួយគ្នានោះដែរ ខណៈសម្តែងរូបតួកនានាបាន ចុះមក ហៃហ្វាយធ្វីសបម និងចាប់ដៃក្មេងៗ និងទស្សនិកជនដែលអង្គុយនៅនឹងកន្លែងធ្វើឱ្យកម្មវិធីនោះកាន់តែមានភាពស្និទ្ធស្នាល។

ឡូវែលជាក្រុងប្រកបដោយភាពចម្រុះទាំងជាតិសាសន៍ និងវប្បធម៌។ ល្បាយនៃភាពចម្រុះនេះផ្តល់ដល់អ្នករស់នៅនូវឱកាសបានសាកល្បង និងរៀនរស់ជាមួយគ្នា ទោះការពិតអ្នកទាំងអស់មានប្រវត្តិនិងផ្នត់គំនិតខុសគ្នាយ៉ាងណាក៏ដោយ។

ដូចនេះ ដោយមិនពិបាកទឹកដល់កន្លែងណាឆ្ងាយសម្រាប់ស្វែងយល់នូវវប្បធម៌ និងរបៀបរស់នៅចម្រុះសាធុជនអាចមកកាន់ឡូវែល ហើយទទួលនូវអត្ថប្រយោជន៍ទាំងអស់នេះ។ តួយ៉ាង អែលម៉ូ ប្រែនណែមសម្រាប់កុមារដ៏ល្បីក្នុងពិភពក្រុមសម្តែង ក៏បានបង្ហាញវត្តមានក្នុងសាលអនុស្សាវរីយ៍ឡូវែល(Lowell Memorial Auditorium) និងបានផ្តល់ភាតរភាពដល់ក្រុមគ្រួសារ និងមនុស្សជាច្រើននាក់ដែលមកទស្សនាការសម្តែងអែលម៉ូ នាចុងសប្តាហ៍នោះ៕






**KhmerPost USA, LLC**

សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម **Advertising**

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ **Editorials**

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**

Kim Phien, Kim Sos, Mao Chan Somnom, Mam Yin, Richard Howe Esq. Sengly Kong, Ph.D. James Ostis

**ច្នៃសោភ័ណភាពកាសែត Design Artist**

Heng Chhunleng

**ជំនួយការរដ្ឋបាល Administrative Assistant**

Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ពិធីបុណ្យរដូវរងារនៅឡូវែលកំពុងឈានចូលមកដល់

**ដោយ : ចេមអសទីស**
**ប្រែសម្រួលដោយ : សុខា**

រៀបចំខ្លួនឱ្យស្រេចបាច់ ដើម្បីចូលរួមក្នុងពិធីបុណ្យរដូវរងារ! ថ្ងៃទី ២១ និង ២២ សាលាក្រុង និងស្ថាប័នជាដៃគូនានានឹងនាំជូនប្រជាជនឡូវែលនូវកម្មវិធីពិសេសសម្រាប់រដូវរងារ គឺពិធីបុណ្យរដូវរងារដែលនឹងត្រូវធ្វើឡើងនៅទីប្រជុំជនឡូវែលដោនថោន ។ ពិធីបុណ្យនេះ អាយុបាន១៤ឆ្នាំហើយ ។

កម្មវិធីបុណ្យរដូវរងារបង្ហាញខ្លួនក្នុងឋានៈប្រៀបប្រដូចទៅនឹងពិធីបុណ្យប្រជាជនដែលគេតែងតែធ្វើឡើងក្នុងរដូវក្តៅនោះអញ្ចឹងដែរ ។ កម្មវិធីនេះ នឹងប្រព្រឹត្តទៅពេញចុងសប្តាហ៍ស្របគ្នានឹងការបង្ហាញជូននូវកម្មវិធីផ្សេងៗជាច្រើនទៀតក្នុងរដូវរងារនេះផងដែរ ។

សម្រាប់រាត្រីនៃថ្ងៃសុក្រភ្ញៀវចូលរួមកម្មវិធីដែលមានអាយុ២១ឆ្នាំឡើងទៅនឹងអាចសាកស្រាបៀរ ហើយអាចចូលរួមប្រកួតផឹកស្រាប្រចាំឆ្នាំលើកទី៣នៃម៉ៃក្រូប្រ៊ូក្នុងខ្លឹបតង់ពណិស ។ ចូលដល់រាត្រីនៃថ្ងៃសៅរ៍ក្លិបតង់ពណិសមួយនេះនឹងក្លាយទៅជាពិធីជប់លៀងផូឡាផាទីដែលមានផ្តល់ជូននូវការប្រគុំតន្ត្រីដោយផ្ទាល់មានវត្តមានអ្នកសិល្បៈព្រមទាំងមានអាហារ និងភេសជ្ជៈជាច្រើនមុខ ។

ទន្ទឹមនឹងតន្ត្រីអាហារ និងភេសជ្ជៈចម្រុះមានសកម្មភាពសំខាន់មួយទៀត គឺការប្រកួតអូសទាញមនុស្សលើទឹកកក ។ មួយក្រុមនឹងតម្រូវឱ្យមានមនុស្ស៦នាក់ដែលបានតាំងចិត្ត និងរៀបចំខ្លួនជាស្រេចក្នុងការប្រកួត ។ ការប្រកួតអូសទាញមនុស្សលើទឹកកកនេះនឹងប្រព្រឹត្តទៅនៅធ្លាមុខមជ្ឈមណ្ឌល ចេ អេហ្វ ខេ ។ ពិសេសអំពីក្រុមប្រកួត គឺពួកគេអាចច្នៃស្លៀកពាក់នូវសម្លៀកបំពាក់ជាក្រុម តាមគំនិតច្នៃប្រឌិតសម្បូរបែបរបស់ពួកគេបាន ។

រាល់ព័តិមានបន្ថែម សូមចូលកាន់គេហទំព័រ www.lowellwinterfest.org ៕

# Lowell Winterfest is Coming

**By James Ostis**

Get ready for the biggest party of the winter! On February 21st and 22nd, the City of Lowell and its partners will present Lowell Winterfest in locations all throughout downtown Lowell. Sometimes considered the snow-bound answer to the summer's Lowell Folk Festival, Winterfest enters its 14th year this month with a weekend long celebration featuring new events and returning favorites.

Following the event's opening ceremonies Friday night, guests over 21 can sample a number of the 25 craft beers in the competition at the third annual Microbrew Showcase at the Club Celsius tent. Saturday, Club Celsius turns over to the Polar Party featuring live performances from several local artists and a variety of food and drink vendors. The heated tent is a great way for Winterfest guests to warm up during chilly February evenings. Another crowd favorite, the North Bowl Soup Competition will take place at the Masonic Temple throughout the day Saturday. Local vendors and organizations provide a wide variety of soups, stews, and chowders.

While all of the weekend's activities provide excellent dining and entertainment options, the Human Dogsled Competition is unique to Winterfest. Local organizations and groups sponsor teams of six in a spirited race down the snow-covered track outside JFK Plaza, often in creative outfits and costumes. The competition stretches over two days and has featured dozens of teams throughout the years.

For more information and a complete Winterfest schedule, please visit www.lowellwinter-fest.org.

# ប្រគុំតន្ត្រីរំឭកអនុស្សាវរីយ៍ អ្នកសិល្បៈឡូវែល

**ដោយ : ចេមអសទីស**
**ប្រែសម្រួលដោយ : សុខា**



កម្មវិធីប្រគុំតន្ត្រីដែលទទួលបានរង្វាន់ហៅកាត់ថា ណេម៉ានោះនឹងធ្វើឡើងនៅសាលអនុស្សាវរីយ៍ឡូវែល ព្រមទាំងទីតាំងផ្សេងៗទៀតនៅឡូវែលរួមមានទាំងអាយ ស៊ីស៊ី និងសុងហ្គាសអារេណានៃសាលាយូម៉ាស។

កម្មវិធីនេះរំឭកឡើងវិញ និងឱ្យតម្លៃដល់អ្នកដែលមានភាពប៉ិនប្រសព្វ និងទេពកោសល្យខាងតន្ត្រី ហើយបើនិយាយពីឡូវែលក៏អាចស្ទើរតែចាត់ទុកបានថាជាផ្ទះនៃតន្ត្រីផងដែរ។

អ្នកស្រី ដិប ប៊ីលែនជឺ ពីខាងមជ្ឈមណ្ឌលទេសចរណ៍សម្រាប់តំបន់ឡូវែលបានមានប្រសាសន៍ថា តំបន់ញូអ៊ីងលែនចម្រុះដោយតន្ត្រីយ៉ាងសម្បូរបែបលំអរសជាតិជីវិតនៃការរស់នៅរបស់ប្រជាជន។

លោកអ្នកអាចរកទិញសំបុត្រទុកជាមុនដើម្បីចូលរួមទស្សនាការប្រគុំតន្ត្រីបានតាមគេហទំព័រ www.nemusicawards.com

# New England Music Awards Return to Lowell

The Fourth AnnualNew England Music Awards(NEMA)will tak e center stage at the Lowell Memorial Auditorium and other locations in the city during Winterfest weekend. NEMA features two nights of awards ceremonies and live concerts that showcase some of the best musical talent in the New England region. Highlights includeSaturday's Artist Conference that will take place from noon to 5:00 p.m. at the UMass Lowell Inn and Conference Center and the concluding concert of the weekend at the Lowell Memorial Auditorium on February 22nd hosted by Comedian Steve Sweeney.

Deb Belanger, Executive Director of The Greater Merrimack Valley Convention and Visitors Bureau had this to say about The New England Music Awards, "The Merrimack Valley has such a robust and diverse music scene. Having Lowell be home to The New England Music Awards is a natural fit for the region. Our track record of hosting first class music festivals and our geographical location also allows us to draw new visitors throughout New England to recognize and engage our music industry. Having this event be during the 2014 Winterfest celebration, also gives us the opportunity to showcase these award winning musicians to visitors coming to Lowell for the weekend!"

This year marks the second time the NEMA is taking place in Lowell, home of some of the region's storied musical performances at the Lowell Folk Festival and Lowell Summer Music Series. To reserve tickets and learn more about the New England Music Awards, please visit

**www.nemusicawards.com.**

Continued from Page 01

## The Ethnic Press and Lowell

American Revolution when German and Irish immigrant communities joined countless others who were publishing newspapers at that time.

Lowell was not founded until 1826 but from the beginning the city had many newspapers. However, it was only after the Civil War when tens of thousands of immigrants arrived that the ethnic press fully emerged in Lowell. In 1878, a local printer named John Harrington felt that the existing Lowell newspapers were too focused on long-time city residents and the Republican policies they favored, so he started a newspaper that represented the views of his fellow Irish immigrants and the Democratic Party they embraced. He called his newspaper the Lowell Sun.

While every immigrant group that came to Lowell in the late 19th century had its own newspaper, it was the French-Canadians who were the most active publishers. The oldest and longest lasting of the French papers was L'Etoile which means "star" in French. It began in 1886 and continued until 1957. An advertisement in the 1931 Lowell city directory claimed that with 4,500 copies printed daily, L'Etoile was "the best way to reach the 35,000 French-Americans of Lowell and vicinity in their own language."

The mission of the ethnic press in America has not changed. The Khmer Post USA fulfills the same function for the Cambodian people that L'Etoile did for the French. Newcomers to our community are always interested in news about their former country, news that is often overlooked by the mainstream media. Newspapers like the Khmer Post USA also help preserve the language, culture and customs of its readers. **(Continued to page 27)**




តមកពីទំព័រទី ១

## សារព័ត៌មាននៃជាតិពន្ធ និងឡូវែល

ភាសាអន្តរជាតិ ។ សារព័ត៌មាននៃជាតិពន្ធមួយនេះពិពណ៌នាទូវអ្នកអានដែលមានលក្ខណៈច្បាស់លាស់ផ្អែកទៅលើភាសា, សញ្ជាតិ ឬសាសនា សារព័ត៌មាននៃជាតិពន្ធនេះ បានចាប់ផ្តើមកំណើតឡើងក្នុងពេលមានបដិវត្តន៍ក្នុងប្រទេសអាមេរិក ខណៈដែលជនជាតិអាល្លឺម៉ង់ និងអាយរីស បានអន្តោប្រវេសន៍មកកាន់ទឹកដីនេះ ហើយបានចូលរួមបោះពុម្ពផ្សាយ ក្នុងវិស័យសារព័ត៌មានច្រើនរាប់មិនអស់ ។

ឡូវែលត្រូវបានប្រសិទ្ធនាមឡើងរហូតដល់ឆ្នាំ ១៨២៦ ប៉ុន្តែតាំងពីចំណាប់ផ្តើមក្រុងនេះ ពោរពេញទៅដោយក្រុមហ៊ុនសារព័ត៌មាន ។ តែទោះជាយ៉ាងនេះក៏ដោយ គឺវាក្រោយពីសង្គ្រាមស៊ីវិល គឺនៅពេលដែលអន្តោប្រវេសន៍ច្រើនជាង១ម៉ឺននាក់បានចូលរួម សារព័ត៌មាននៃជាតិពន្ធនេះ ក៏ចាប់ផ្តើមរីកសាយឡើងនៅតំបន់ឡូវែល ។ ឆ្នាំ ១៨៧៨ ក្រុមហ៊ុនបោះពុម្ពផ្សាយក្នុងតំបន់ឈ្មោះថា ចន ហារិងតុន បានយល់ឃើញថា សារព័ត៌មាននានាក្នុងក្រុងឡូវែលផ្តោតអារម្មណ៍ខ្លាំងពេកទៅលើម្ចាស់ស្រុកក្រុងឡូវែល និងមានទំនោរទៅកាន់សាធារណរដ្ឋនោះ ដូចនេះ លោកក៏ចាប់ផ្តើមបង្កើតឱ្យមានសារព័ត៌មានដែលតំណាងឱ្យទស្សនៈនៃក្រុងស្រលាញ់អារីសដូចគ្នាជាមួយនឹងលោកបង្ហាញពីជំហរប្រជាធិបតេយ្យ និងគណបក្សនយោបាយដែលកាន់លទ្ធិនេះ ។ លោកក៏ចាប់ផ្តើមឱ្យឈ្មោះសារព័ត៌មានរបស់លោកថា ឡូវែលសាន់ ។

ខណៈដែលក្រុមអន្តោប្រវេសន៍មកកាន់ឡូវែលក្នុងឆ្នាំនៃសតវត្សរ៍ទី១៩ បានក្លាយជាម្ចាស់ជំនួញផ្អែកសារព័ត៌មាន, ក្នុងនោះក៏មានបារាំង កាណាដា ដែលជាជាតិសាសន៍មានភាពសកម្មជាងគេខាងវិស័យសារព័ត៌មាននេះ ។ កាសែតបារាំង កាណាដា ដែលមានអាយុចំណាស់ និងស្ថិតក្នុងវិស័យនេះបានយូរជាងគេមានឈ្មោះថា "ឡេះទ្បឺ" មានន័យថា "ផ្កាយ" ជាភាសាបារាំង ។ កាសែតនេះផ្តើមនៅឆ្នាំ១៨៨៦ និងបន្តសកម្មភាពដល់ឆ្នាំ១៩៥៧ ។ ពាណិជ្ជកម្មមួយដែលបោះផ្សាយក្នុងឆ្នាំ១៩៣១ខាងទីស្នាក់ការបង្ហាញគោលដៅក្នុងតំបន់ឡូវែលបានបង្ហាញថា មានកាសែតចំនួន៤៥០០ច្បាប់ ដែលបោះផ្សាយជារៀងរាល់ថ្ងៃ ហើយកាសែត "ឡេ-ត-ឡឺ" ជាកាសែតទទួលបានភាពដាច់គេក្នុងការចូលទៅដល់សហគមន៍បារាំងអាមេរិកាំង ក្នុងតំបន់ឡូវែល និងភាពជោគជ័យនៃការផ្សព្វផ្សាយភាសារបស់ពួកគេ ។

បេសកកម្មនៃសារព័ត៌មានរបស់ជាតិពន្ធនេះមានក្នុងសហរដ្ឋអាមេរិក និងមិនបានផ្លាស់ប្តូរសាបរលាបឡើយ ។ **តទៅទំព័រទី ២៧**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងថ្មីៗសំរួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០៣ ខែកុម្ភៈឆ្នាំ២០១៤

## ក្រសួងសុខាភិបាលបំភ្លឺរឿងវ៉ាក់សាំងបង្ការជំងឺកញ្ជ្រឹល និងស្អូច

**ដោយ: Simon Henderson and Phorn Bopha - February 3, 2014**

ក្រសួងសុខាភិបាលបានចាត់វិធានការបញ្ឈប់ការភ័យខ្លាចជាសាធារណៈចំពោះសុវត្ថិភាពនៃវ៉ាក់សាំងបង្ការជំងឺកញ្ជ្រឹល និងស្អូចដែលត្រូវបានផ្តល់ឱ្យកុមារកម្ពុជាចំនួន៤.៥លាននាក់ក្នុងរយៈពេលបីខែចុងក្រោយនៃឆ្នាំ២០១៣ បន្ទាប់ពីមានពាក្យចចាមអារ៉ាមថា? វ៉ាក់សាំងនេះបង្កផលប៉ះពាល់ដល់សុខភាព នេះបើយោងតាមសេចក្តីប្រកាសព័ត៌មានរបស់ក្រសួងដែលបានចេញកាលពីសប្តាហ៍មុននេះ។

កាលពីខែមករា មន្ត្រីកម្មវិធីជាតិផ្តល់ថ្នាំបង្ការបានប្រកាសថា ខ្លួនបានផ្តល់វ៉ាក់សាំងបង្ការជំងឺកញ្ជ្រឹល និងស្អូចដល់កុមារ៤.៥លាននាក់ដែលមានអាយុចន្លោះពី៩ខែទៅ១៥ឆ្នាំក្នុងខែតុលា វិច្ឆិកា និងធ្នូ គឺលើសគោលដៅដែលបានកំណត់ត្រឹមតែ៤លាននាក់។ នេះជាកម្មវិធីចាក់ថ្នាំបង្ការទូទាំងប្រទេសធំបំផុតមិនធ្លាប់មាននៅកម្ពុជា។

ក្រសួងសុខាភិបាលអង្គការសុខភាពពិភពលោក និងមូលនិធិកុមារអង្គការសហប្រជាជាតិបានចេញសេចក្តីថ្លែងការណ៍រួមមួយដែលមានខ្លឹមសារថា "ថ្មីៗនេះមានពាក្យចចាមអារ៉ាមគ្មានមូលដ្ឋានមួយចំនួនដែលបានបង្កឱ្យមានការភាន់ច្រឡំ និងការភ័យខ្លាចនៅក្នុងសហគមន៍មួយចំនួន ដោយបានសួររកប្រភព និងគុណភាពវ៉ាក់សាំងដែលត្រូវបានប្រើយ៉ាងជោគជ័យក្នុងយុទ្ធនាការផ្តល់វ៉ាក់សាំងបង្ការជំងឺកញ្ជ្រឹល និងស្អូចនៅចុងឆ្នាំ២០១៣"។

សេចក្តីថ្លែងការណ៍នេះមានការធានាអះអាងចំពោះសាធារណជនថា វ៉ាក់សាំងនេះមានសុវត្ថិភាព និងមានប្រភពត្រឹមត្រូវ ប៉ុន្តែពុំមានការបរិយាយល្អិតល្អន់អំពីពាក្យចចាមអារ៉ាមនោះទេ។ សេចក្តីថ្លែងការណ៍នេះមានខ្លឹមសារថា "យើងសូមបញ្ជាក់សាជាថ្មីថា រាល់វ៉ាក់សាំងទាំងអស់ដែលត្រូវបានប្រើដោយក្រសួងសុខាភិបាលក្នុងកម្មវិធីជាតិ គឺត្រូវបានផ្តល់ដោយអង្គការ យូនីសេហ្វ (UNICEF) ដែលបានមកពីក្រុមហ៊ុននានាដែលត្រូវបានទទួលស្គាល់ដោយអង្គការសុខភាពពិភពលោក...ដើម្បីធានាថា កុមារទទួលបានតែវ៉ាក់

តទៅទំព័រទី ១៣

## Ministry Seeks to Quash Measles, Rubella Vaccination Rumors

**By Simon Henderson and Phorn Bopha | February 3, 2014**

The Ministry of Health has moved to calm public fears over the safety of the measles and rubella (MR) vaccine, which was administered to 4.5 million Cambodian children in the last three months of 2013, as rumors circulate that it poses sinister health risks, according to a statement issued last week.

In January, the National Immunization Program announced it had surpassed by 500,000 its goal of giving the combined MR vaccine to 4 million children between 9 months and 15 years of age in October, November and December, the largest nationwide vaccination program ever carried out in Cambodia.

"Recently, there have been a number of unfounded rumors that have wrongly caused confusion and provoked fear in some communities by questioning the source and quality of the vaccine which has been used so successfully in the vaccination campaign against measles and rubella in late 2013," says the joint statement by the Ministry of Health, the World Health Organization (WHO) and the UNICEF.

The statement assures the public that the vaccine is safe and properly sourced but does not elaborate upon the specific nature of the claims made against it.

"We would like to reiterate that all vaccines used by the Ministry of Health in the national program are sourced by Unicef from companies approved by the World Health Organization…in order to ensure that people receive only the best quality vaccines," the statement says, adding that it is imperative that parents and guardians trust the government and seek advice from local health workers about the benefits of the vaccines.

Richard Duncan, a technical officer for the WHO's Expanded Program on Immunization, said that he could not comment on the rumors other than to say that they **Continued to Page 13**

## គណបក្សប្រជាជនចោទបក្សប្រឆាំងថា កំពុងព្យាយាមធ្វើរដ្ឋប្រហាររដ្ឋធម្មនុញ្ញ

***ដោយ: Khuon Narim - February 3, 2014***

លោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងជាឧបនាយករដ្ឋមន្ត្រីបានក្លាយជាសមាជិកជាន់ខ្ពស់ថ្មីបំផុតក្នុងជួររដ្ឋាភិបាលរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលបានចោទប្រកាន់គណបក្សសង្គ្រោះជាតិថា បានប៉ុនប៉ង "ផ្តួលរំលំ" រដ្ឋាភិបាល ប៉ុន្តែអ្វីដែលលោកបានអះអាងនោះគឺ "រដ្ឋប្រហាររដ្ឋធម្មនុញ្ញ"។

នៅក្នុងការបង្ហោះមួយលើគេហទំព័រក្រសួងមហាផ្ទៃ កាលពីថ្ងៃព្រហស្បតិ៍ បន្ទាប់ពីកិច្ចប្រជុំជាមួយលោក យូជី គូម៉ាម៉ារុ (Yuji Kumamaru) ឯកអគ្គរាជទូតជប៉ុនប្រចាំប្រទេសកម្ពុជាក្នុងរាជធានីភ្នំពេញ លោក ស ខេង បានលើកឡើងថា លោកបានប្រាប់ឯកអគ្គរាជទូតថា គណបក្សប្រឆាំងកំពុងតែព្យាយាមផ្តួលរំលំរដ្ឋាភិបាលដោយបដិសេធមិនព្រមទទួលយកលទ្ធផលនៃការបោះឆ្នោត កាលពីខែកក្កដាឆ្នាំ២០១៣ និងដោយអំពាវនាវឱ្យមានការបោះឆ្នោតសាជាថ្មីឡើងវិញ។

ដោយយោងតាមគេហទំព័ររបស់ក្រសួងមហាផ្ទៃបានឱ្យដឹងថា លោក ស ខេង បានប្រាប់លោកឯកអគ្គរាជទូត គូម៉ាម៉ារុ ថា "សកម្មភាពរបស់មេដឹកនាំគណបក្សសង្គ្រោះជាតិ គឺជាទង្វើចង់បំផ្លាញលទ្ធផលនៃការបោះឆ្នោតដោយចេតនា ដើម្បីផ្តួលរំលំរដ្ឋាភិបាលតាមរយៈរដ្ឋប្រហាររដ្ឋធម្មនុញ្ញ"។

លោក ស ខេង បានបន្តថា "យើងមើលឃើញថា មេដឹកនាំគណបក្សសង្គ្រោះជាតិគ្មានឆន្ទៈពិតប្រាកដ ដើម្បីដោះស្រាយបញ្ហានយោបាយនៅកម្ពុជាឡើយ។ រីឯគណបក្សប្រជាជនវិញគឺត្រៀមខ្លួនចរចានៅគ្រប់ថ្នាក់ទាំងអស់ និងនៅពេលណាមួយក៏បាន"។ ប៉ុន្តែលោក ស ខេង បានបន្ថែមថា "ការទាមទារឱ្យមានការបោះឆ្នោតជាថ្មីឡើងវិញ គឺជាការទាមទារមួយដែលយើងមិនអាចទទួលយកបានឡើយ"។

ដើម្បីការពារលទ្ធផលនៃការបោះឆ្នោតដែលអ្នកឃ្លាំមើលការបោះឆ្នោតទាំងជាតិ និងអន្តរជាតិមួយចំនួនបានលើកឡើងថា មានភាពមិនប្រក្រតីនោះលោក ស ខេង បានលើកឡើងថា លទ្ធផលនៃការបោះឆ្នោត **តទៅទំព័រទី ២១**

## Sar Kheng Accuses CNRP of Launching 'Constitutional Coup'

**By Khuon Narim | February 1, 2014**

Interior Minister and Deputy Prime Minister Sar Kheng became the latest senior member of Prime Minister Hun Sen's CPP government to accuse the opposition CNRP of attempting to "topple" the government though what he claimed is a "constitutional coup."

In a posting to the Interior Ministry website on Thursday following a meeting with the Japanese Ambassador to Cambodia, Yuji Kumamaru, in Phnom Penh, Mr. Kheng said that he told the ambassador that the opposition was trying to oust the government by refusing to accept the disputed result of the July 2013 national election, and by calling for a new vote.

"The activities of the CNRP leaders are acts aimed at intentionally destroying the election result in a bid to topple the government through a constitutional coup," Mr. Kheng told Ambassador Kumamaru, according to the ministry's website.

"We see that the CNRP leaders have no real will to resolve the political issue in Cambodia," Mr. Kheng continued, adding that the CPP is prepared to "negotiate at all levels, and at any time."

Though, Mr. Kheng added: "Demanding a re-election is a demand we cannot accept."

Defending the outcome of the July election, which numerous national and international monitors say was riddled with irregularities designed to boost the chances of the incumbent CPP, Mr. Kheng said the result of the vote was legitimate as polling day was "better than previous elections because there was no violence and it was free."

CNRP spokesman Yim Sovann responded to the Interior Minister on Friday saying that it was the CPP who had ignored the Constitution when it proceeded with inaugurating a National Assembly in which only one party has taken its seats: the CPP.

The CNRP's 55 lawmakers-elect have boycotted parliament in protest at the conduct of the July election.

"Parliament needs two parties but the CPP has used a single party to create it own National Assembly," Mr. Sovann said.

"Who is making a coup?" he asked. "Who sent the **Continued ti Page 13**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំពូកប្រែសំរួលពីកាសែតអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ច័ន្ទ ទី០៣ ខែកុម្ភៈឆ្នាំ២០១៤

# អ្នកភូមិមានកំហឹងចាប់ឃាត់ខ្លួននគរបាលដែលបង្កសំឡេង រំខាននៅថ្ងៃបុណ្យចូលឆ្នាំប្រពៃណីចិន

**ដោយ: Ben Sokhean - February 3, 2014**

អ្នកភូមិមានកំហឹងមួយក្រុមនៅក្នុងខណ្ឌសែនសុខ រាជធានីភ្នំពេញ ដែលនាំគ្នាអបអរពិធី



បុណ្យចូលឆ្នាំចិនកាលពីល្ងាចថ្ងៃសុក្រ បានចាប់ខ្លួនមន្ត្រីនគរបាលពីរនាក់ដែលពួកគាត់ចោទថា បានរំខានភាពស្ងប់ស្ងាត់។

មុនពេលកើតហេតុមន្ត្រីនគរបាលទាំងពីរនាក់នេះបានជិះម៉ូតូក្រឡឹងជុំវិញកន្លែងមួយដែលមានការរៀបចំពិធីអបអរបុណ្យចូល ឆ្នាំចិន និងបានរោទិ៍ម៉ាស៊ីនម៉ូតូឱ្យលាន់ឮខ្លាំង។ ឃើញបែបនោះ អ្នកភូមិព្រួយបារម្ភខ្លាចពួកគេបុកក្មេងៗនេះបើតាមការឱ្យដឹងពី លោក វណ្ណ បឿង នាយរងប៉ុស្តិ៍ព្រែកព្នៅ។ **តទៅទំព័រទី ២១**

## New Year Party-Goers Turn On Noisy Police

**By Ben Sokhean | February 3, 2014**

A crowd of angry villagers in Phnom Penh's Sen Sok district who were celebrating Chinese New Year on Friday evening performed a citizen's arrest on two men—both police officers—whom they accused of disrupting the peace.

The two police officers had been wildly riding around the area where the lunar New Year festivities were taking place and revving a loud motorcycle, and villagers were concerned that they might knock down young children, according to Van Boeurng, deputy Prek Phnov commune police chief.

Villagers shouted at the pair to stop making noise and be more careful, at which point one of the two officers pistol-whipped a villager, further incensing the crowd, Mr. Boeurng said.

"They rode a big motorbike and had a gun too," he said. "About 50 people crowded round to stop them and one of the police officers shot two bullets into the air."

Nearby commune police then arrived at the scene, taking the pair to the local police station for questioning, Mr. Boeurng said.

Hang Vanny, second deputy commune police chief, would not give the names of the two men, but said they were police officials.

"They are low-ranking officials because they had guns," he said, explaining the men had behaved badly because they were drunk.

Commune police then passed the men on to district police, and they are currently undergoing questioning with the municipal police, Sorm Lythol, district penal police chief, said Sunday.

តមកពីទំព័រទី ១២ **ក្រសួងសុខាភិបាលបំភ្លឺរឿង...**

សំាងណាដែលមានគុណភាពល្អបំផុត" ដោយមានការបន្ថែមថា វាជារឿងចាំបាច់ដែលឪពុកម្តាយ និងអាណាព្យាបាលត្រូវជឿជាក់លើរដ្ឋាភិបាល និងស្វែងរកជំបូន្មានពីបុគ្គលិកសុខាភិបាលក្នុងមូលដ្ឋានពាក់ព័ន្ធនឹងផលប្រយោជន៍នៃវ៉ាក់សាំងទាំងនេះ។

លោក រីឆាដ ដាន់ឃិន (Richard Duncan) មន្ត្រីបច្ចេកទេសនៃកម្មវិធីពង្រីកការផ្តល់ថ្នាំបង្ការរបស់អង្គការសុខភាពពិភពលោកបានលើកឡើងថា លោកមិនអាចធ្វើអត្ថាធិប្បាយអំពីពាក្យចចាមអារ៉ាមនេះបានទេ គឺអាចនិយាយបានត្រឹមតែថា វាពាក់ព័ន្ធនឹងគុណភាព និងប្រភពនៃវ៉ាក់សាំងប៉ុណ្ណោះ។ លោកបានមានប្រសាសន៍ថា "រាល់ពាក្យចចាមអារ៉ាមដែលយើងបានឮរហូតមកទល់នឹងពេលនេះ គឺមិនពិតទេ ។ វ៉ាក់សាំងទាំងនោះបានមកពីអង្គការយូនីសេហ្វ និងត្រូវបានទទួលស្គាល់ដោយអង្គការសុខភាពពិភពលោក ហើយយើងមានទំនុកចិត្តទាំងស្រុងលើវា" ដោយបន្ថែមថា ពាក្យលេចឮក្រោយមានកម្មវិធីចាក់វ៉ាក់សាំងបង្ការនេះ គឺមិនមែនមានតែនៅកម្ពុជាទេ។

លោក ដាន់ឃិន បានលើកឡើងថា ការទទួលបានព័ត៌មានរឹតតែងាយស្រួលតាមរយៈប្រព័ន្ធអ៊ីនធើណិត និងការកើនឡើងនូវការប្រើប្រាស់បណ្តាញភ្ជាប់ទំនាក់ទំនងសង្គម ដូចជាហ្វេសប៊ុកជាដើមបានរួមចំណែកដល់ការផ្សព្វផ្សាយពាក្យចចាមអារ៉ាមបែបនេះនៅកម្ពុជា ប៉ុន្តែលោកបានបញ្ជាក់ថា វានឹងមិនប៉ះពាល់ដល់យុទ្ធនាការផ្តល់វ៉ាក់សាំងទេ ព្រោះគោលដៅទាំងអស់ត្រូវបានសម្រេចរួចរាល់ហើយ។ លោកបានមានប្រសាសន៍ថា "ទោះជាយ៉ាងណាយើងក៏មានការព្រួយបារម្ភដែរថា វាអាចធ្វើឱ្យខូចកម្មវិធីផ្តល់វ៉ាក់សាំងបង្ការដែលធ្វើរៀងរាល់ឆ្នាំបាន៕

**សេរីវុធ**

Continued from page12

## Ministry Seeks to...

concerned the qualty and sourcing of the vaccine.

"Every single one of the rumors we are hearing are false—the vaccines are sourced by Unicef and approved by the WHO and we have complete confidence in them," he said, adding that backlash to vaccination programs is not unique to Cambodia.

Mr. Duncan said that easier access to information online and the rise of social media may have facilitated the spread of rumors in Cambodia, though he said it would not affect the vaccination campaign as it had already achieved all its objectives.

"We are concerned, however, that it may undermine the annual routine vaccination programs," he said.

Continued from page12

## Sar Kheng Accuses CNRP of ...

armed forces to kill people on Veng Sreng Street?" he continued, referring to the military police shooting dead five protesters and wounding more than 40 during mass garment factory strikes early last month.

The CPP government has since suspended the constitutional right to freedom of assembly, which legal experts say is illegal.

When asked to explain the workings of the CNRP's "constitutional coup," Interior Minister spokesman Lieutenant General Khieu Sopheak deferred the question to Major General Por Pheak, director of the ministry's international communication's department. Maj. Gen. Pheak, however, deferred the question back to Lt. Gen Sopheak.

CPP lawmaker Cheam Yeap was more forthcoming, saying on Friday that he concurred with Mr. Kheng's assessment of the situation.

According to Mr. Yeap, a coup d'etat does not require troops and CNRP President Sam Rainsy is attempting to topple the CPP government through his activities in Europe and the U.S.

Mr. Yeap said that Mr. Rainsy is trying to "block the nose, mouth and throat" of the country so that "goods cannot be exported from Cambodia."

"The CNRP's is a constitutional coup and they are against the Constitution," Mr. Yeap added.

It was, however, Mr. Rainsy who first used the phrase "constitutional coup" when, in September, he accused Mr. Hun Sen of doing just that when he inaugurated a new parliament with only his 68 CPP lawmakers in attendance and without the participation of the CNRP's 55 members of parliament.

# Reason Why Protesters Remain Nonviolent

## ទស្សនៈៈហេតុអ្វីបានជាបាតុករនៅប្រកាន់ធ្វើអហិង្សាថ្ងៃអង្គារ ៣១ធ្នូ ២០១៣

**Tuesday, December 31, 2013**

**By The Cambodia Daily - December 31, 2013**

**"ខេមបូឌា ដេលី" ថ្ងៃអង្គារទី៣១ ធ្នូ ២០១៣**

**By Catherine Morris**

ការកើនឡើងនូវភាពតឹងតែងពីលទ្ធផលបន្ទាប់បោះឆ្នោត នឹងពីពលកម្មបណ្តាលឱ្យមានការបាញ់សម្លាប់២នាក់នឹងរបួសយ៉ាងច្រើន ។ ក្រុមតវ៉ាដោយសន្តិភាពបានតម្លើងកំហឹងទៅគប់ដុំថ្មនឹងវាយគ្នាជាមួយក្រុមប៉ូលីសដែលមកបង្ក្រាបបាតុករប្រដាប់ដោយគ្រាប់បែកផ្សែង កាណុងបាញ់ទឹក ដំបង គ្រាប់កៅស៊ូនឹងគ្រាប់មែនទែន ។ នៅពេលដែលមានការប្រើកងកម្លាំងទ័ពនឹងអាវុធផ្ទុះជាអំពើដែលត្រូវដាក់កំហុស រីឯបាតុករក៏ត្រូវរៀនសូត្រពីបុព្វហេតុពាយ៉ាងដែលអាចរក្សាអហិង្សាបាន បើទោះជាប្រឈមមុខនឹងការបង្ករឿងក៏ដោយ ។

**ទី១** - អហិង្សាធានាថា "បាតុករនឹងរក្សាសីលធម៌បានខ្ពស់" ការរុញច្រាន ការប្រើដំបងគប់ដុំថ្ម ទាំងអស់នេះនឹងធ្វើឱ្យមានផលអាក្រក់ដល់សេចក្តីថ្លៃថ្នូនៃចលនា ។ រូបថតសូម្បីតែ១សន្លឹកនៃហិង្សារបស់យុវជនចោលដុំថ្ម ឬរូបព្រះសង្ឃម្តងហើយម្តងទៀត នៅក្នុងព័ត៌មាន ឬនៅក្នុង"អិនធឺណែត" គឺបន្ថយសីលធម៌របស់អាជ្ញាធរ ហើយនឹងបុព្វហេតុគួរគោរពដែលគេមាន ។

**ទី២** - មានតែការប្រមូលផ្តុំមនុស្សដោយសន្តិភាពទេ ដែលទទួលការគាំទ្រដោយច្បាប់សិទ្ធិមនុស្សអន្តរជាតិ មិនមែនការវាយតប់ហិង្សា ឬកុប្បកម្មទេ ។ អាជ្ញាធរមានភារកិច្ចប្រើច្បាប់ជាធរមាន ដើម្បីការពារសាធារណជននឹងធានាសណ្តាប់ធ្នាប់ ។ ការវាយសម្រុកចូលប្រឆាំងនឹងប៉ូលីសនឹងការធ្វើឱ្យខូចខាតដល់សម្បត្តិ គឺជាអំពើឧក្រិដ្ឋអាចមានទោសស្របច្បាប់បាន ។

**ទី៣** - ការស្រាវជ្រាវថ្មីៗបង្ហាញថា "ឃោសនាអហិង្សាមានប្រសិទ្ធភាពជាងការតស៊ូដោយអាវុធ" ។ អ្នកស្រាវជ្រាវ អេរីកា ឆេនវីត នឹង មារីយ៉ា ស្តេហ្វាន់ សិក្សាអំពីចលនាតស៊ូហិង្សានឹងអហិង្សាដែលមាននៅជុំវិញពិភពលោកពីចន្លោះឆ្នាំ១៩០៦ ដល់ ២០០៦ ហើយមានការភ្ញាក់ផ្អើលនឹងឃើញលទ្ធផលថា ចលនាតស៊ូឃោសនាអហិង្សាបានសម្រេចជោគជ័យលើសពី២ដងច្រើនជាងចលនាតស៊ូហិង្សា ។

ហេតុអ្វីបានជាការតស៊ូអហិង្សាស៊ីវិលមានប្រសិទ្ធភាពអ្វីម្លេះ? ការស្រាវជ្រាវរបស់ ឆេនវីត



នឹងស្តេហ្វិនបង្ហាញថា ការចូលចិត្តចូលរួមក្នុងការឃោសនាអហិង្សាមានទំហំ៤ដងធំជាងការតស៊ូហិង្សាស្ទើរតែទាំងអស់ ។ នៅពេលមកធ្វើបាតុកម្មបញ្ចេញយោបល់ជាសាធារណអាចនឹងមានគ្រោះថ្នាក់ ជាពិសេសនៅក្នុងរបបផ្តាច់ការនិយមការរៀបចំចលនាអហិង្សាបានល្អ ជាទូទៅមានបច្ចេកទេសដែលមានគ្រោះថ្នាក់តិច ដូចជាពហិការការតវ៉ាពីលំនៅដ្ឋាន ការតវ៉ា "ដើរយឺតៗ" មនុស្សអាយុប៉ុន្មាន ក៏អាចចូលរួមបានដែល ។

ការគ្រោះថ្នាក់សីលធម៌របស់អហិង្សាក៏មានទាបដែរ ។ ចលនាអហិង្សាមិនអំពាវនាវធ្វើឱ្យមានគ្រោះថ្នាក់ដល់នរណាទេ ការឃោសនាអឹង្សាធ្វើឱ្យគេចូលចិត្តហើយទាក់ទាញអ្នកគាំទ្រនៅពេលដែលក្រុមប៉ូលីសរំលោភច្បាប់សិទ្ធិមនុស្សអន្តរជាតិដោយរខិតខំបំបាត់អ្នកតវ៉ាដោយសន្តិវិធីអ្នកអង្គុយចុះតវ៉ាមានប្រសិទ្ធិភាពជាងមករុញច្រានរនាំងការពារទៅទៀត ។ ការធ្វើខុសរបស់ក្រុមប៉ូលីស គឺវាជាក់ស្តែងណាស់នៅពេលគេបាញ់គ្រាប់បែកផ្សែងបង្ហៀទឹកភ្នែក បាញ់កាណុងទឹកប្រើដំបងប្រឆាំងទៅលើបាតុករអហិង្សាដែលអង្គុយចុះ ។ នោពេលដែលដំណឹងចេញផ្សាយក្នុងសារព័ត៌មានក្នុងប្រព័ន្ធផ្សព្វផ្សាយសង្គមសកម្មភាពរំលោភរបស់ប៉ូលីសលើបាតុករអហិង្សាបង្កើតឱ្យមានការខឹងសម្បារពីសំណាក់ក្រុមសង្កេតការណ៍ក្នុងតំបន់នឹងអន្តរជាតិ ហើយវានឹងបង្កើនការគាំទ្រដល់ចលនា ។ ការវាយបំបែកយ៉ាងរំលោភអាចនាំឱ្យប៉ូលីសនៅពេលខ្លះបែរជាចូលចិត្តខាងចលនាអ្នកតស៊ូស៊ីវិលទៅវិញ ។

ឧទាហរណ៍តូចមួយដែលកើតឡើងនៅភ្នំពេញកាលពីខែកញ្ញានាយទាហ៊ានដែលមិនបញ្ចេញឈ្មោះម្នាក់ចូលរួមបណ្តេញបាតុកម្មអ្នកក្រីក្រនៅវត្តភ្នំ គេចាប់សម្តីបានថា ក្រុមបាតុករ "គ្មានរំខាននរណាសោះ ខ្ញុំជានាយប៉ូលីសយោធា ហើយខ្ញុំមិនចូលចិត្តរឿងរបៀបនេះទេ ។ ថ្នាក់ដឹកនាំប្រឈមមុខនឹងការប្រឆាំង នឹងការហាត់ហ្វឹកហ្វឺន "ឋានន្តរសក្តនឹងជួរ" រីឯបាតុករខំទប់ទល់ចំណង់យ៉ាងខ្លាំងខ្លា ដើម្បីប្រឆាំងនឹងការបង្ករឿងដោយអយុត្តិធម្ម ។

ប៉ុន្តែយ៉ាងណាក៏ដោយឧបសគ្គដ៏ធំបំផុតនៃអហិង្សា គឺការនៅតែរឹងរុះនឹងជំនឿទាំងខុសថា ការតស៊ូតាមអាវុធមានកម្លាំងខ្លាំងជាងអហិង្សា។ អ្នកដឹកនាំតស៊ូស៊ីវិលត្រូវការឱ្យមានជំនឿយ៉ាងជាក់ច្បាស់ថា មានឧទាហរណ៍ជាច្រើននៅលើផែនដីនេះ ប្រឆាំងនឹងទ្រឹស្តី ម៉ៅ សេទុង ដែលថា "អំណាចហូរចេញពីចុងកាំភ្លើង"។ បើទោះជាការឃោសនាតស៊ូហិង្សា ឬអហិង្សាដែលគ្មានគ្រោះថ្នាក់អ្វីក៏ដោយ ឬក៏មានការធានាណាមួយត្រូវដឹងថា ការជឿជាក់ទៅលើ"អហិង្សា"នឹងបង្កើនសំណាង២ដងលើស ដើម្បីសម្រេចគោលបំណង ។

Catherine Morris has written about or taught conflict studies and international human rights at universities and other settings around the world.

តមកពីទំព័រទី ៥ ព័ត៌មានខ្លីៗ-Short news

# ២_ចលនាវត្តលើវត្តក្រោមចូលគ្នានៅឡូវែល

**ឡូវែល:** សហគមន៍ខ្មែរនៅឡូវែលកំពុងតាមដានវត្តត្រៃរតនារាមដែលឮថា នឹងចូលគ្នាវិញអស់រយៈកាល៤ឆ្នាំហើយ ប្រកបដោយការប្តឹងប្តល់គ្នារវាងក្រុមអ្នកនៅជាន់លើនឹងក្រុមអ្នកនៅជាន់ក្រោម រហូតដល់មានការបិទវត្តទាំងមូលដោយគ្មានកំណត់ថ្ងៃថែមទៀត ។



បន្ទាប់ពីអន្តរាគមន៍ក្រុមប្រឹក្សាវប្បធម៌ខ្មែរតំណាងដោយលោក ខឹម ចាន់ថា នឹងលោក សែម មាស ខិតខំទាញក្រុមទាំង២ឱ្យចូលគ្នាតែធ្វើមិនបានឥឡូវមានក្រុមថ្មីមួយទៀតដែលសង្ឃឹមថានឹងមានកម្លាំងជាងក្រុមមុនដឹកនាំដោយក្រុមអ្នកបញ្ចុះបញ្ចូលមាន ១-លោក សុខ អ៊ឹម ២-លោក ជា តែម ៣-លោក ផេង អាន នឹង៤-លោក អ៊ុច សុជាតិ មានក្រុមចាស់ទុំជាម្ចាស់ស្រុក ១៤រូប ចូលរួមគាំទ្រផង ។ក្នុងបញ្ជីអ្នកទាំង១៤នាក់ មានឈ្មោះដូចតទៅ: ១-លោកជ័យ ស៊ុំ ២-លោក ជា ជាង ៣-លោកឌុល ឌីម ៤-អាចារ្យ ធូ សារឿន ៥-អាចារ្យ ប្រាក់ សារី ៦-អាចារ្យ ម៉ម ផាន ៧-អាចារ្យ ម៉ូវ សារី ៨-លោកម៉ៅ រាំ ៩-លោកឃិន សន ១០-លោក ស៊ុម សាំងគិម ១១-លោក វើត លន់ ១២-លោកហូ ម៉ែកូលប៊ីន ១៣-លោកហួត សម្បត្ត ១៤-លោកឱ សុវិថា ។ ក្រុមអ្នកបញ្ចុះបញ្ចូលតាមរយៈលោក សុខ អ៊ឹម បាននិយាយកាលពីថ្ងៃទី១កុម្ភៈនេះថា "ក្រុមលោកបានជួបគណកម្មការទាំងវត្តក្រោមវត្តលើ សំណូមពរឱ្យអ្នកទាំង២ក្រុម ប្រគល់ភារៈកិច្ចគ្រប់គ្រងវត្តជាបណ្តោះអាសន្នទៅក្រុមចាស់ទុំទាំង១៤រូប ដែលមានករណីកិច្ចរៀបចំការបោះឆ្នោតក្នុងរយៈពេល៣ទៅ៦ខែ ជ្រើសរើសគណកម្មការថ្មីរបស់វត្តតែមួយនឹងជួសជុលវត្តធំទប់ស្កាត់កុំឱ្យខូចខាតកាន់តែធ្ងន់ -ក្រុមលោកមានពេលរហូតដល់ថ្ងៃទី៣០ មករា២០១៤ ដើម្បីធ្វើឱ្យបានសម្រេចគំនិតបង្រួបបង្រួមវត្តត្រៃរតនារាមនេះ- នៅថ្ងៃទី១ កុម្ភៈ ពួកខ្ញុំធ្វើមិនទាន់បានសម្រេចអ្វីទេ ដូច្នេះយើងបញ្ចប់ភារៈកិច្ចទាំងអស់គ្នារួចហើយ" ។ នៅលើសំនួរថា "តើក្រុមណាមួយដែលមិនព្រមរួបរួម តើមូលហេតុអ្វី?" លោក សុខ អ៊ឹម ឆ្លើយថា "វត្តខាងលើថា យល់


អ៊ឹម សុខ

ព្រមតាមសំណើរទាំងអស់តែមិនឃើញអ្វីជាលាយលក្ខណ៍អក្សរមកឱ្យក្រុមយើងទេ រីឯក្រុមខាងក្រោមបានសរសេរសំណូមពរនៃការរួបរួមវត្តមួយចំនួនដែលយើងអាចធ្វើទៅបាន លុះត្រាតែគណកម្មការវត្តទាំង២លាលែង ហើយប្រគល់ភារកិច្ចឱ្យក្រុមចាស់ទុំបណ្តោះអាសន្នកាន់កាប់វត្តជាមុនសិន ទើបយើងអាចធ្វើការទៅមុខកើត" ។ នៅវត្តខាងលើមានព្រះសង្ឃ៥អង្គគង់នៅកុដិតូចក្នុងបរិវេណវត្តត្រៃរតនារាម រីឯវត្តខាងក្រោមមានព្រះសង្ឃ៣អង្គគង់សព្វថ្ងៃនៅផ្ទះឯកជនក្នុងក្រុងការច្របាច់វត្តឱ្យចូលតែមួយតម្រូវឱ្យព្រះសង្ឃមកគង់តែមួយកន្លែងនៅកុដិតូចរួមគ្នា។ នៅពេលសួរថា តើព្រះសង្ឃទាំងសងខាងមានព្រះទ័យយ៉ាងណាដែរ? លោកសុខ អ៊ឹម ថា "ព្រះតេជគុណ សែម សារិន វត្តក្រោមមានសង្ឃដីការថាគង់ចូលគ្នានៅកុដិតូចមិនទាស់ខុសអ្វីទេ តែអាត្មាគួរជួបពរះសង្ឃវត្តលើពិភាក្សាគ្នាជាមុនដែរ -ជួបព្រះតេជគុណ មី ឡាំ លោក លាង លោក ស៊ីម វត្តខាងលើលោកមានសង្ឃដីកាថា ព្រះសង្ឃអាចគង់ជុំគ្នាបានតែត្រូវសួរគណកម្មការជាមុនសិន ។


គណៈកម្មការវត្តលើ


វត្តត្រៃរតនារាម

ក្រុមបញ្ចុះបញ្ចូលវត្តត្រៃរតនារាមបានបញ្ចប់បេសកកម្មអាយុខ្លីពាសប្តាហ៍របស់ខ្លួនយ៉ាងប្រញាប់ប្រញាល់ធ្វើឱ្យគណកម្មការវប្បធម៌ខ្មែរ លោកចាន់ថា ខឹម ធ្វើការវាយតម្លៃថា "មិនគួរបញ្ចប់យ៉ាងបង្ខំដូចនេះទេ ត្រូវតែបន្តរហូតបានសម្រេច បើមិនធ្វើដូច្នេះទេ បានន័យថា ធ្វើត្រឹមតែលាងវត្តលើឱ្យបានស្អាតជាមួយស្មារតីថា ចង់បង្រួបបង្រួមវត្តតែមួយដែរ តែតាមពិតក្រុមនេះមិនដែលបង្ហាញឆន្ទៈនោះទេ" លោកបន្តថា ខ្ញុំធ្វើការជួយបង្រួបបង្រួមវត្តលើវត្តក្រោមតំណាងឱ្យពលរដ្ឋខ្មែររាប់រយនាក់នៅឡូវែលនេះ ខ្ញុំមិនឈប់ងាយៗរបៀបនេះទេ ៕



តមកពីទំព័រទី ១

# ប្រេសក្លឹបព័ត៌មានខ្មែរផុស...

អាហារថ្ងៃត្រង់ បុហ្វេ ខ្មែរ មានឡុកឡាក់ ណែមចៀន តៅហ៊ូ ខាត់ណា សាច់ត្រីចៀនចំណិតៗ ញាំសាលម៉ុន អាម៉ុក និងមុខម្ហូបមានឱជារសជាច្រើនទៀតពីស្នាដៃម្ចាស់ហាង ទេពធីតាខ្មែរ អ្នកស្រីលី ផ្ដល់ជូនភ្ញៀវកិត្តិយសមន្ត្រីបម្រើការងារសាលាក្រុង និងអ្នកបំពេញការងារពីស្ថាប័នឯកជនទាំង ធនាគារមជ្ឈមណ្ឌលថែទាំសុខភាពមនុស្សចាស់ខាងអចលនវត្ថុ ។ល។



Roger and Soben Pin formerly published the Khmer Post newspaper in Philadelphia before moving to Lowell more than a year ago. In Philadelphia, they routinely held gatherings where members of the city's Cambodian community and public officials could come together and discuss the issues of concern to the community. Roger and Soben have now brought that practice to Lowell, hosting the first Khmer Post USA Press Club yesterday (January 31, 2014) at the Tepthida Khmer Restaurant on Chelmsford Street. A buffet lunch was served and then members of the local Cambodian community and city officials spoke.

វាគ្មិនទីមួយដែល មកក្នុងនាមតំណាង សហគម **គឺអ្នកស្រី បុប្ផា មេឡុន** បច្ចុប្បន្នជាប្រធានគណៈកម្មការនៅសហគមខ្មែរ ។ អ្នកស្រីបានពន្យល់ពីស្ថានភាពបច្ចុប្បន្ននៃសមាគមខ្មែរ គឺលែងស្ថិតក្នុងឈ្មោះជនភៀសខ្លួនទៀតហើយ ដូចនេះ



មានកិច្ចការមួយចំនួនដែលត្រូវតម្រូវឱ្យសមាគមខ្មែរទទួលបន្ទុក ។ អ្នកនាងបញ្ជាក់ពីកម្មវិធីចំនួនពីរដែលមាននៅក្នុងសមាគមខ្មែរនាពេលបច្ចុប្បន្ននោះ គឺកម្មវិធីថែទាំសុខភាពមនុស្សចាស់ និងសកម្មភាពសម្រាប់យុវជន ។ សមាគមខ្មែរមានសេចក្ដីសោមនស្សដែលនឹងផ្លាស់ទីស្នាក់ការរបស់ខ្លួនទៅកាន់ទីតាំងថ្មីនៅផ្លូវ ស្គូលស្ទ្រីត ប៉ុន្តែកំពុងរង់ចាំលិខិតអនុញ្ញាតិមុននឹងបានសិទ្ធិផ្លាស់ទៅទីតាំងថ្មីនោះ ។

The first community speaker was Bopha Malone who is the chair of the Cambodian Mutual Assistance Association. She explained that CMAA has been in operation for 30 years now and it no longer is dealing with refugees. The two big issues now are care of elders and activities for youth. CMAA is excited about moving to its new site on School Street but is still waiting for the proper permits from the city.

វាគ្មិនតំណាងសហគមន៍ទី២ **គឺលោកបណ្ឌិត សេង លីគង់** ដែលជាប្រធានក្រុងខ្មែរ ។ លោកបានលើកយកនូវប្រយោគមួយឃ្លាដែលរដ្ឋមន្ត្រីការបទេស ខូ លីន ផូវែល បានមានប្រសាសន៍ថា "គ្រប់គ្នាអាចក្លាយជាបុគ្គលអស្ចារ្យបានដរាបណាទទួលបានឱកាស ។ លោក សេង លីគង់ មានប្រសាសន៍ថា គណកម្មការក្រុងខ្មែរមានសេចក្ដីប្រាថ្នាចង់ឃើញក្រុងខ្មែរមួយដែល



ល្អប្រសើរ ។ ក្រុងខ្មែរមានតំបន់ជាច្រើនដែលត្រូវការឱ្យមានភ្លើងបំភ្លឺទៅតាមដងផ្លូវ និងត្រូវការឱ្យមានវត្ថុសិល្បៈសាធារណៈដាក់តាំងនៅផ្លូវមួយចំនួន ដើម្បីបង្ហាញពីតំបន់គោលនៃវប្បធម៌ខ្មែរ ជាពិសេសអំឡុងសតវត្សទី១២ និង១៣ ។ លោកលើកឡើងបន្តទៀតថា ក្នុងក្រុងឡូវែលមានអ្នកជំនាញខ្មែរសរុបជា ២៤០ហើយបានផ្ដល់ការងារឱ្យបានខ្មែរធ្វើការប្រមាណ ៥០០០នាក់ និងបម្រើសហគមន៍អាស៊ានជាង ៣៥០០០នាក់ក្នុងតំបន់ឡូវែល ។

The second community speaker was Sengly Kong who is the chair of the Cambodia Town committee. He opened by quoting former Secretary of State Colin Powell who said "everyone can become great if given the opportunity." Sengly said that the committee wants to have the opportunity to make Cambodia Town great. He said the Cambodia Town area needs more lights, wider sidewalks and public art that represents the core cultural values of Cambodia, especially from the 12th and 13th centuries. He said there are 240 Southeast Asian run businesses in Lowell. They employ 5000 workers and serve the 35,000 Southeast Asian residents of Lowell.

វាគ្មិនទី៣នៃសហគមន៍គឺលោក **អាដាំ ព្រិល** ជាម្ចាស់សឱសថស្ថាន វ៉ាវើលនៅផ្លូវហៃឡែន ។ លោកបានលើកឡើងថា លោកមិនពាក់ព័ន្ធ ទៅនឹងផ្នែកនយោបាយទេ តែលោកក្នុងការងារជំនាញរបស់លោកប្រឈមនឹងបញ្ហាជាច្រើនក្នុងការបើកជំនួញនៅឡូវែល ។ លោកបានចូលគេហទំព័រសាលាក្រុងដើម្បីស្វែងរកមើលរបៀបណែនាំ ប៉ុន្តែលោកមិនបានឃើញអ្វីសោះ ។ លោកក៏មានជំនួញមួយទៀតនៅក្រុងកៃ្បឡូវែលគឺ ជេប ជីរៀល ហើយលោកទទួលបទពិសោធន៍ដោយឡែកពីនេះ ។



លោក អាដាំ បានលើកឡើងបន្តថា រដ្ឋបាលនៅក្រុង ជេប ធីរៀល ដែលជាក្រុងតូចនោះ មានតម្លាភាព ហើយមានមន្ត្រីសាលាក្រុងដែលលោកអាចទំនាក់ទំនងបានងាយស្រួលអាចឆ្លើយនូវចម្ងល់នានារបស់លោកបាន ។ អាដាំ បានបើកជំនួញមានបទពិសោធន៍ជាង៣០ឆ្នាំ ប៉ុន្តែមិនដែលមានឱកាសចូលរួមកម្មវិធីសារព័ត៌មានដូចនេះ ពីមុនមកទេ ។ លោកបានវាយតម្លៃថាកម្មវិធីនេះមានសារសំខាន់ណាស់ ។ លោកចង់ឃើញ និងចង់ស្គាល់មន្ត្រីសាលាក្រុងឱ្យបានច្រើនឡើង ជាពិសេស គឺរបៀបទំនាក់ទំនងជាមួយពួកគេបាន ។ លោកឆ្ងៀតបញ្ជាក់ថា បេក្ខជនទីប្រឹក្សាក្រុងបង្ហាញមុខតែម្ដងក្នុងពេលបោះឆ្នោតរកសន្លឹកឆ្នោតរកការគាំទ្រតែដល់ក្រោយបោះឆ្នោតក៏បាត់មុខឈឹង ប្រសិនបើរដ្ឋបាលល្អកើតមានក្នុង ជេបជីរៀល បាននោះឡូវែលក៏អាចធ្វើបាន ។

The third community speaker was Adam Pril, owner of One World Pharmacy on Highland Ave. He said he doesn't get involved in politics but he encountered "many problems" opening his business in Lowell. He went to the city's website for guidance but didn't find any. He has another business in Pepperell and had a very different experience. Government in Pepperell is very "transparent" with elected officials promptly answering emails. He says he has been in Lowell for 30 years but has never been to a gathering like this. He thought it was very valuable. He wants to know more about the city councilors, especially how to contact them. They are around at election time and then disappear right afterwards. "If Pepperell can do it, Lowell can do it too."

**ប្រធានក្រុងប៊ីបលីន :** ជាមន្ត្រីសាលាក្រុងដំបូងគេដែលមានមកតិក្នុងកម្មវិធីក្លឹបអ្នកសារព័ត៌មានខ្មែរផុស ។លោកងាកទៅមើល បទពិសោធន៍ការងារ ច្រើនជាង៧ឆ្នាំ ហើយលោកជឿជាក់ទៅលើស្ថិរភាពនៃផ្នែកហិរញ្ញវត្ថុនៅក្នុងក្រុងឡូវែល និងគោលដៅបណ្ដាក់ទុនរយៈពេលវែងដែលធ្វើឱ្យឡូវែលក្លាយជាកន្លែងប្រសើរបាន ។ លោកក៏មានមោទនភាព ចំពោះលទ្ធភាពដែលអាចប្រាស្រ័យទាក់ទងជាមួយអ្នកភូមិផង និងក្រុមជាតិពន្ធទាំងឡាយ ។ លោកបានឆ្លើយតប អាដាំ ព្រិល ថា មានមនុស្សជាច្រើនបានទូរស័ព្ទទាក់ទងមកកាន់សាលាក្រុង ហើយមន្ត្រីសាលាក្រុងក៏ទូរស័ព្ទទៅពួកគេវិញ ។ លីន ដែលជាប្រធាន



ក្រុងក៏បានមានមោទនភាពពីទំនាក់ទំនងដែលសាលាក្រុងបានភ្ជាប់មកបង្កើតជាមួយសហគមន៍ខ្មែរផងដែរ ។ គំនិតនៃការបង្កើតក្រុងខ្មែរ គឺប្រសិទ្ធឡើងតាមរយៈការធ្វើការសហការគ្នារវាងក្រុង និងអ្នករស់នៅផ្ទាល់។ ប៉ុន្តែមានកិច្ចជាច្រើនទៀត ដែលត្រូវសម្រេច។ មន្ត្រីរដ្ឋបាលក្រុងគួរតែត្រូវបានទទួលការអញ្ជើញ និងចូលរួមក្នុងសហគមន៍ឱ្យបានកាន់តែច្រើនជាងមុន ។ លោកបានតែងតាំងឱ្យមានគណៈកម្មការក្រុងសម្រាប់អ្នកភូមិនៅឡូវែល និងសម្រាប់ស្ត្រី និងប្រជាជនខ្មែរ ។ ទោះជាយ៉ាងណាប្រជាជនខ្មែរក្នុងសហគមន៍ត្រូវតែបោះជំហ៊ានរួមគ្នា និងចូលរួមឱ្យបានសកម្មក្នុងការបោះឆ្នោតបម្រើការងារដែលបានតែងតាំងនោះ និងចូលរួមធ្វើការក្នុងការិយាល័យរបស់សាលាក្រុង ។

City Manager Bernie Lynch was the first city official to speak. He said looking back on his seven plus years as city manager he believed the stability of the city's finances and long term investments have made Lowell a better place. He's also proud of the efforts to reach into neighborhoods and ethnic groups. He tells Adam that plenty of people do call city councilors because they then call him. Lynch said he's proud of the relationship the city has developed and maintained with the Cambodian community. The idea of Cambodia town came out of the city working with the neighborhood. But much more needs to be done. City Government should be more inviting. He has appointed to boards and commissions neighborhood people, women and Cambodians. Still, everyone in the Cambodian community must step forward and get involved by voting, serving in appointed positions and running for office.

នាយប៉ូលិសលោក **វិលៀម ថាយឡឺ** ជាវាគ្មិនបន្ទប់ ។ លោកបានបម្រើការងារជានាយ ប៉ូលិសអស់៣២ឆ្នាំ និងមានសេចក្ដីសោមនស្សរីករាយក្នុងការផ្ដល់របាយការណ៍ដែលបានកើតឡើង ពេលលោកបម្រើការក្នុងអំឡុង២ឆ្នាំចុងក្រោយនេះ ។ ខាងស្ថាប័នយើងបានធ្វើការជ្រើសរើសមន្ត្រីប៉ូលិសដែលមានសញ្ជាតិជាជនជាតិអាស៊ីឱ្យបម្រើការនៅក្នុងស្ថាប័ន ។ វាមានសារសំខាន់ចំពោះការបំពេញការងារឆ្លើយតប និងតម្រូវការសហគមន៍ក្នុងពេល

ដែលមានភាពចម្រុះជាតិសាសន៍ធ្វើការជាមួយគ្នា ។ ក្នុងអនាគតដ៏ឆាប់ខាងមុខលោក និងប្រកាសធ្វើវិសោធនកម្មរចនាសម្ព័ន្ធក្នុងស្ថាប័នប៉ូលិសដែលលោកបម្រើការ ដើម្បីឱ្យមានមន្ត្រីប៉ូលិសបម្រើការនៅនឹងមូលដ្ឋានដោយថ្មើជើងដោយកង់ និងនៅប្រជុំជនដោនថោន និងលើរទេះកង់ពីរ ។ មានសកម្មភាពប៉ូលិសជាច្រើនដែលឆ្លើយតបនឹងតម្រូវការសហគមន៍ងាយស្រួលស្វែងរកភាពប្រសើរឡើងក្នុងសហគមន៍។ លោកមានប្រសាសន៍ថា នេះជាភាពជាអ្នកដឹកនាំថ្មីដែលក្រុមប៉ូលិស និងចាប់ផ្តើមសាកល្បង និងផ្តោតការយកចិត្តទុកដាក់ ជាពិសេសលើបញ្ហាគ្រឿងញៀន និងក្មេងទំនើង ។



Police Superintendent Bill Taylor spoke next. He said that he's been a Lowell Police officer for 32 years and was happy to report that in the past two years the department has hired four Southeast Asian officers. He said it's important for the police department to reflect the community. In the near future, he'll be announcing a restructuring of the police department that better emphasizes community policing with more officers on foot, on bikes and in the downtown, on Segway scooters. A lot of community policing involves the application of common sense in finding ways to better connect the officers to the community. He also said that his new leadership team will have the investigative units in the department focus more on the connections between drugs and gangs.

ទីប្រឹក្សាក្រុង **រីតា មឺស្សឺ** ឡើងមានប្រសាសន៍បន្ទាប់។ លោកស្រីបានលើកឡើងថា កម្មវិធីថ្ងៃនេះបានបង្ហាញពីស្មារតីប្រជាធិបតេយ្យយ៉ាងល្អប្រសើរ។ តាមប្រសាសន៍របស់លោកស្រីលោកស្រីបម្រើការងារជាទីប្រឹក្សាក្រុងអស់រយៈពេល១៩ឆ្នាំមកហើយ ហើយលោកស្រីរីករាយបំពេញការងារនេះរហូតមក ព្រោះលោកស្រីថ្លែងថា លោកស្រីស្រឡាញ់ប្រជាជន។ លោកស្រីបានបម្រើតួនាទីនេះក្នុងនាមជាអ្នកនាំសារនាំកង្វល់នានារបស់របស់ប្រជជនឱ្យសាលាក្រុងបានដឹងឮ។ ថ្លែងបន្តក្រុងឡូវែលពោរពេញដោយល្បាយជាតិសាសន៍គួបផ្សំនឹងភាពជាដៃគូដ៏ល្អ។ លោកស្រីបន្តថា លោកស្រីរស់ នៅឡូវែល ក្នុងសង្កាត់ហៃឡែនអស់រយៈពេល៣០ឆ្នាំ និងបានចំណាយ៥ឆ្នាំបម្រើការងក្នុងអគារបំពេញការងារដែលជាប់នឹងភោជនីយដ្ឋាន។ គិតទៅពេលនោះ វាជាហាងនំប៉័ង។ ទីប្រឹក្សាក្រុងរីតា មឺស្សឺ មានមោទនភាព និងពេញចិត្តលើការខិតខំរបស់លោកស្រីដែលទទួលបានជោគជ័យក្នុងការអន្ទងសារព័ត៌មានខ្មែរផុសឱ្យមកកាន់ទីស្នាក់ការនៅឡូវែល។



Rita Mercier spoke next. She said this type of meeting represents "Democracy at its best." She's been on the city council for 19 years and enjoys what she does "because I love people." She said she was a messenger who brings the concerns of residents to City Hall. She said the city is rich in ethnic diversity with many good partnerships. She said he used to live in this lower Highlands neighborhood for 30 years and spent five years working in the very building in which the restaurant was located. Back then, it was Price's bakery. Rita took credit for convincing Soben and Roger to move their newspaper from Philadelphia to Lowell and for Top Donut expanding into Lowell rather than Haverhill.

លោកអភិបាលក្រុង **រ៉ដនី អេលៀត** មានប្រសាសន៍បន្ទាប់។ លោកមានប្រសាសន៍ថា ប្រធានក្រុងលីន និងទីប្រឹក្សាក្រុងរីតាបានមានប្រសាសន៍អស់ ហើយលើចំណុចដែលលោកត្រៀមលើកឡើង។ លោកមានប្រសាសន៍ទៅកាន់ទស្សនិកជនអ្នកចូលរួមកម្មវិធីនាថ្ងៃនោះ យើងទាំងអស់គ្នាធ្វើការ ដើម្បីអ្នករាល់គ្នា។ យើងចង់ជួយជំនួញដែលទើបកើតថ្មីឱ្យបានប្រសើរឡើង។ លោកអភិបាលក្រុងបានឱ្យតម្លៃដល់សារសំខាន់នៃសាពត៌មានខ្មែរផុសសហរដ្ឋអាមេរិកដែលភ្ជាប់សហគមន៍ឱ្យមានជិតស្និទ្ធ ព្រមទាំងរំឮកពីជោគជ័យនៃការឈ្នះឆ្នោតរបស់លោកតាមរយៈពាណិជ្ជកម្មដែលលោកបានផ្សាយក្នុងសារព័ត៌មានខ្មែរផុសផងដែរ។



Mayor Rodney Elliott spoke next, saying that the City Manager and Rita Mercier had "said it all." He said to the audience "we are here for you" and that "we want to help new businesses." He commended the valuable service the Khmer Post provides to the community and said he recognized the importance of the paper during the election by advertising in it.

ទីប្រឹក្សា **ខរីបីលែនជី** ក៏បានចូលរួមបញ្ចេញមតិផងដែរ។ លោកមានប្រសាសន៍ថា លោក អាចនឹងថ្មីប្រឡូកក្នុងនយោបាយតែលោកមានបទពិសោធន៍ផ្នែកជំនួញជាង១២ឆ្នាំមក ហើយល្មមលោកអាចយល់បានពីកង្វល់ឧបសគ្គនានាដែលកើតមានចំពោះប្រជាជនក្នុងសហគមន៍។ លោកបានមានប្រសាសន៍ក្នុងនាមជាប្រធានគណៈកម្មការផ្នែកអភិវឌ្ឍសេដ្ឋកិច្ចកិច្ចការអាទិភាពដែលលោកគ្រោងនឹងធ្វើគឺបង្កើតនូវការទំនាក់ទំនងរវាងម្ចាស់ជំនួញឱ្យបានល្អ និងជួយឱ្យមានការរីកចម្រើនក្នុងសាលាក្រុង។



City Councilor Corey Belanger also spoke. He said he may be a new councilor but that he's been a business owner in Lowell for twelve years and as such understands the everyday struggles of small businesses very well. He said as head of the economic development subcommittee, his priority will be establishing good communications between businesses and developers and City Hall.

បន្ទាប់មកទៀត ស្ត្រីម្នាក់ដែលអញ្ជើញមកពីខាងផ្នែកអចលនវត្ថុដែលមានអតិថិជនជាប្រជាជនឡូវែលមានជនជាតិខ្មែរ និងអាហ្វ្រិក ហើយអតិថិជនមានបំណងនឹងផ្លាស់ចេញពីឡូវែលដោយហេតុផល គឺបារម្ភពីប្រព័ន្ធអប់រំសាធារណៈក្នុងក្រុងឡូវែល។

Next, a woman who works as a real estate broker whose clients are mainly Cambodian and African said that many of them want to leave Lowell because of concerns they have about the public schools.



គណៈកម្មការសាលា **ដេវ ខុនវ៉េយ៍** បានឆ្លើយតបនឹងសេចក្តីព្រួយបារម្ភនេះ ដោយលើកឡើងនូវសេចក្តីស្នើរបស់លោកទៅកាន់សាលាស្តីពីសុវត្ថិភាព ពោលគឺបង្កើនតម្រូតសណ្តាប់ធ្នាប់ និងសុវត្ថិភាពក្នុងសាលា។



School Committee member Dave Conway responded to her saying that safety is a priority which is why he made a motion to have a School Resource (Police) Officer placed in every middle school. He said "you can have the best curriculum in the world but if you don't have safety you're not going to have a lot of learning going on." He then mentioned a motion he made to hire a grant writer which was done largely with private funds and closed by sharing a story about a recent experience he had with the new access security system in place at Lowell High. He entered the building through a "back door" but the security guard controlling access would not let him pass until he produced his driver's license and received an official visitor pass. He said that rather been being upset by being barred from the building despite being a member of the school committee, he went right to the Headmaster's office and commended the guard for being so diligent.

កម្មវិធីក៏បានឈានដល់ទីបញ្ចប់ ។ **វីឆាដ** ដែលជាអ្នកនិពន្ធអត្ថបទនេះបានលើកឡើងថា ក្លឹបសារព័ត៌មានខ្មែរផុស គឺជាវេទិកាដែលផ្តល់សម្លេងដល់សមាជិកនានាក្នុងសហគមន៍បានជួបសំណេះសំណាលដោះ ដូរបទពិសោធន៍ យោបល់ និងឈានដល់គំនិតក្នុងការដោះស្រាយបញ្ហានានាក្នុងសហគមន៍ដោយកម្មវិធីនេះមានលក្ខណៈប្រកបដោយមិត្តភាពស្និទ្ធស្នាលតែផ្តោតលើបញ្ហាចោទជាក់ស្តែងរកផ្លូវដោះស្រាយឱ្យចេញជាផ្លែផ្កា។ សារព័ត៌មានខ្មែរផុសសង្ឃឹមថា នឹងបង្កើតកម្មវិធីនេះឱ្យក្លាយជាទម្លាប់ឡើង។



With that the event came to a close. As I said, it was a wonderful opportunity for members of the Cambodian community to meet with city officials in a relaxed social setting while at the same time engaging in serious policy discussions. The Khmer Post hopes to make Press Club a regular event in the city.

តមកពីទំព័រទី ១

## ហេតុអ្វីក៏គណបក្សសង្គ្រោះជាតិចាប់ដៃ...

"សេនកាគឺ" ពាក្យចិនហៅ "ដាយអូយូ" លោកបានស្នើទៅសមាគមអាស៊ានឱ្យជួយគាំទ្រគំនិតនេះ ។

*កម្មផលអី គាប់ជួននៅថ្ងៃដដែលនោះទីភ្នាក់ងារព័ត៌មានចិន"ស៊ីនហួ" ដែលជាអង្គការព័ត៌មានផ្លូវការរបស់ចិនកុម្មុយនីស្តបានសរសេរទីទាន ហ៊ុន សែន ថា មិនចេះគ្រប់គ្រងវិបត្តិនយោបាយប្រទេសខ្លួនឯង ហើយស្នើឱ្យមានការកែទម្រង់ពិតប្រាកដនឹងជ្រាលជ្រៅមួយ ។ ទីភ្នាក់ងារនោះបានរំលឹកពីអ្នកវិភាគម្នាក់បានគិតថាការចុះអូនថយប្រជាប្រិយភាពរបស់ ហ៊ុន សែន គឺមកពីមិនព្រមធ្វើការកែទម្រង់ៈ គិតតែពីគ្រួសារនិយមពុករលួយបណ្តោញរាស្ត្រយកដីអន្តោប្រវេសន៍ខុសច្បាប់គ្មានក្រសួងយុត្តិធម៌ឯករាជ្យអ្នកក្រីក្រជាច្រើនមិនបានទទួលផលពីការីកចំរើន ។ អ្នកសង្កេតការណ៍ជាច្រើន មើលឃើញថាអត្ថបទនេះគឺចិនចង់ធ្វើការព្រមានមួយ ពីព្រោះចិនចង់មានលំនឹងនៅក្នុងដំបន់ "យើងជាប្រទេសឯករាជ្យមួយមិនត្រូវការទទួលបញ្ជាពីនរណាម្នាក់ទេ" នេះជាពាក្យឆ្លើយតបពីអ្នកនាំពាក្យរដ្ឋាភិបាលចិន ។

***ថ្ងៃទី៩វិច្ឆិកាៈ** គ្រាប់ផ្លោងមួយបានផ្ទុះនៅខេត្តព្រះវិហារជិតព្រុំប្រទល់ដែនថៃ ព្រឹត្តិការណ៍របៀបនេះធ្លាប់មានពីមុនមកហើយនៅឆ្នាំ២០០៧នឹង២០០៩ គេសង្ស័យថាយោធាថៃជាអ្នកបង្កតែថៃបានប្រកែកមិនទទួលខុសត្រូវរឿងនេះទេ ។

***ថ្ងៃទី ១៥វិច្ឆិកាៈ** ២-៣ថ្ងៃបន្ទាប់ពីថ្លែងការណ៍ជប៉ុននឹងសមាគមន៍អាស៊ានស្តីពី"សិទ្ធិហោះហើរលើដំបន់ប្រជុំកោះសេនកាគី -ដាយអូយី" មកនាយករដ្ឋមន្ត្រីខ្មែរបានទៅធ្វើទស្សនកិច្ចនៅជប៉ុនលោកបានធ្វើការចុះហត្ថលេខាលើកិច្ចព្រមព្រាងមួយចំនួនមាន"សហប្រតិបត្តិការណ៍សេដ្ឋកិច្ចនឹងលើកិច្ចព្រមព្រាងជាគូរភាគីយុទ្ធសាស្ត្រ" ។ ប្រទេសជប៉ុនគឺជាប្រទេសដែលប្តល់ជំនួយធំជាងគេ រីឯចិនក៏ជាប្រទេសដែលវិនិយោគច្រើន ហើយបានក្លាយជាចំណងមិត្តភាពពិសេសជាងគេសំរាប់កម្ពុជាផង ។ ទស្សនកិច្ចនេះបានធ្វើឱ្យចិនខកចិត្តយ៉ាងខ្លាំងជប៉ុនឆ្លៀតឱកាសនោះដើម្បីផ្តល់ជំនួយ១៩.៤កោដិឱ្យទៅអាស៊ាន ក្នុងរយៈពេល៥ឆ្នាំនឹងផ្តល់ឱ្យកម្ពុជានូវជំនួយ១៣៤លានដុល្លារជាជំនួយដល់គម្រោង៣អ្នកឯកទេសជប៉ុននឹងត្រូវបញ្ជូនមកកម្ពុជានាពេលឆាប់ៗនេះក្នុងគម្រោងកែទម្រង់ប្រព័ន្ធបោះឆ្នោតនៅកម្ពុជា ។ ទស្សនកិច្ចនេះនាំឱ្យមានទស្សនកិច្ចរបស់នាយករដ្ឋមន្ត្រីជប៉ុននៅ១ខែក្រោយមកទៅប្រទេសឡាវនឹងកម្ពុជា រីឯរដ្ឋមន្ត្រីខ្មែរក្រសួងការបរទេសក៏ត្រូវទៅប្រទេសចិននៅខែមករាឆ្នាំ២០១៤ ។

***ថ្ងៃ២៦-២៨ធ្នូៈ** ហ៊ុន សែន ទៅធ្វើទស្សនកិច្ចនៅប្រទេសវៀតណាមហើយជួបនាយករដ្ឋមន្ត្រីគេនៅទីនោះលោកបានចុះហត្ថលេខាសហ-ប្រតិបត្តិការលើកិច្ចសន្យាចំនួន៩វៀតណាមមានពាណិជ្ជកម្មនៅកម្ពុជាចំនួន២.៧កោដ គ្រោងនឹងតម្លើងឱ្យដល់៥កោដនៅឆ្នាំ២០១៥ខាងមុខ ។ នៅថ្ងៃ១៣-១៤មេសាខាងមុខនាយករដ្ឋមន្ត្រីវៀតណាមនឹងមកធ្វើទស្សនកិច្ចនៅកម្ពុជាវិញ ។

គណបក្សប្រឆាំងបានឆ្លៀតពេលស៊ីកការបន្ទោសដោយកឹមសុខាថា "លោក ហ៊ុន សែន ត្រូវជ្រើសរើសរវាងវៀតណាមនឹងពលរដ្ឋខ្មែរ" រីឯ ទេព វ៉ាន់នី អ្នកដឹកនាំចលនាប្រឆាំងនឹងការយកដីធ្លីប្រជាជននិយាយថា "ហ៊ុន សែន ទៅវៀតណាមដើម្បីទៅទទួលបញ្ជាសម្រាប់ធ្វើបាបពលរដ្ឋខ្មែរ" ។




លោក សម រង្ស៊ី ផ្តល់កិច្ចសម្ភាសន៍ជាមួយទូរទស្សន៍ចិន



ហ៊ុន សែន ទៅទស្សនកិច្ចនៅប្រទេសវៀតណាម



សម រង្ស៊ី និង កឹម សុខា ហែរបាតុកម្មនៅភ្នំពេញ

នៅលើរបាយការណ៍នេះបង្ហាញថា រដ្ឋបាលចិន និងកម្ពុជាកំពុងមានការល្អក់ចិត្តនឹងគ្នាយ៉ាងខ្លាំងជាពិសេសចំពោះបុគ្គល ហ៊ុន សែន ដែល សម រង្ស៊ី ឆ្លៀតយកឱកាសដ៏ប្រសើរនេះដើម្បីរុញចិនឱ្យជ្រើសរើសគូរថ្មីមកសំដែងក្នុងរឿងល្ខោនរបស់ចិនដែលមាននាទីជាមហាអំណាចបូកខាងកើតនាពេលនេះ ។ ចំណែកឯចិននឹងវៀតណាមវិញ ដោយសារតែ ១-ការវាតទីរបស់ចិននៅដែនសមុទ្រប៉ា-ស៊ីហ្វិកប៉ះពាល់ដល់ការគ្រប់គ្រងដែនសមុទ្ររបស់វៀតណាម ២-ចិនធ្លាប់ធ្វើសង្គ្រាមវាយព្រមានវៀតណាមនាឆ្នាំ១៩៧៩ នឹងមិនអាចជានាគ្នាដោយស្មោះសបានវិញដោយស្រួលទេ ។ នេះប្រាកដជាឱកាសដែល សម រង្ស៊ី អាចយល់ថា ដែលប្រសើរបំផុតសម្រាប់ប្រើដៃចិនដោះខ្មែរចេញពី ហ៊ុន សែន ផង នឹងពីវៀតណាមថែមទៀតផង ពីព្រោះការកែទម្រង់ដែលចិនចង់ឃើញមានស្ថេរភាពក្នុងតំបន់នោះ អាចសង្ឃឹមថា សម រង្ស៊ី ជាមួយនឹងប្រជាពលរដ្ឋដែលកំពុងគាំទ្រយ៉ាងពេញទំហឹងនោះអាចធ្វើបានទាំងអស់ចំណែកឯរដ្ឋបាល ហ៊ុន សែន នឹងប្រទេសវៀតណាមពុំអាចផ្តល់ឱ្យបានទេ ដោយបាត់បង់ប្រជាប្រិយភាពអស់រលីង ទោះជាប្រើកម្លាំងបាយខ្លាំងប៉ុណ្ណា ឬជះលុយឱ្យច្រើនប៉ុណ្ណាទៀតក៏ដោយ ។

ចិនបានបង្ហាញថ្មីៗនេះ ពីការលើកទឹកចិត្តដល់ក្រុមបាតុករ ដែលរប្រឹងប្រែងរំលំផ្តួលរបប ហ៊ុន សែន ដោយឯកអគ្គរដ្ឋទូតចិននៅភ្នំពេញចេញមកទទួលបាតុករកម្មករដែលនាំញត្តិទៅជូនប្រទេសចិនដោយខ្លួនឯង ហើយទទួលបាតុករជាភ្ញៀវចំនួន២ម៉ោងក្នុងបរិវេណស្ថានទូតទៀតផង ដែលទង្វើនេះ ពុំមានស្ថានទូតណាមួយផ្សេងទៀតធ្វើដូចនេះទេ ។ លោក សម រង្ស៊ី អាចនឹងភ្លាត់ស្នៀតធ្លាក់ក្នុងអន្ទាក់ចិន ដូចសម្តេចនរោត្តម សីហនុ ពីព្រោះរាស្ត្រខ្មែរអាចនឹងចងចាំហើយមិនពេញចិត្តនឹងការដែលចិនលើកបន្ទុបខ្មែរក្រហមរហូតដលមានការសម្លាប់មនុស្សជិត២លាននាក់ដោយគ្មានការទទួលខុសត្រូវតែគេក៏អាចចងចាំដែរថា សម រង្ស៊ី គោរពប្រជាធិបតេយ្យរួបរួមកម្លាំងគ្នាជាមួយ កឹម សុខា ដែលជាកម្លាំងប្រជាធិបតេយ្យម្នាក់ទៀត នេះជាអម្រែកមានទម្ងន់ដូចគ្នា ទើបអាចដើរទៅមុខរួច បើភ្លាត់ស្នៀតមែន គឺធ្លាក់ទៅតែម្នាក់ឯងប៉ុណ្ណោះអម្រែកទៅមុខទៀតមិនបាន មិនអាចបង្ហំដើរទៅរកសេចក្តីស្លាប់រាប់លាននាក់បាន ដូចពេលមុនទៀតទេ ។ សម រង្ស៊ី - កឹម សុខា ឈ្នះទឹកចិត្តប្រជាពលរដ្ឋរាប់លាននាក់ដោយមានរាស្ត្រស្ម័គ្រចិត្តចេញមកគាំទ្រឱ្យជាសញ្ញាថាជាមេដឹកនាំជាតិពិតបរាកដមិនមែនក្លែងក្លាយទេ ឥឡូវ សម រង្ស៊ី បានបានយកជីវិតនយោបាយទៅប្រថុយប្តូរនឹងសេចក្តីសម្រេចចិត្តរបស់មហាអំណាចពិភពលោកទៀតគឺចិនដែលមានឥទ្ធិពលលើពិភពលោកដូចអាមេរិកាំងដែរ នេះប្រាកដជាសំណាងថ្មីរបស់ប្រជាពលរដ្ឋខ្មែរ ប្រកែកមិនបាននោះហើយ ៕

តមកពីទំព័រទី ៣

## ដំណើរតាមជើងសមុទ្រ "អាត់ឡង់ទីក" ...

ដោយបានឈរនៅកន្លែងដែលពិភពលោកខ្លាចរអារជាង៥០ឆ្នាំដ៏អស្ចារ្យនេះ ។

ហើយខ្ញុំនៅតែជឿជាក់ថា "ន័រវេស៊ាន" នឹងនាំខ្ញុំឱ្យទៅដល់ "បាហាមាស" ជាប្រាកដដែលនៅទីនោះ មហានាវាទេសចរនេះនឹងឈប់សំចតពីព្រលឹមទល់ព្រលប់ ដើម្បីអនុញ្ញាតឱ្យភ្ញៀវចុះកំសាន្តបាន១ថ្ងៃពេញ ។

មហានាវាយើងបានមកសំចតនៅទន្ទឹមនឹងមហានាវាឯទៀតចំនួន៣គាំងពីព្រលឹមនៃដំណើរថ្ងៃទី៥នៅកោះ "បាហាមាស" ដែលជាគោលដៅ "កោះទេសចរ" ដ៏ធំមួយតែក៏ជាប្រទេសឯករាជ្យដ៏តូចបំផុតមួយទេ មានប្រជាជនសម្បុរស្បែកខ្មៅនិយាយបីភាសា គឺបាហាមាស១ អង់គ្លេស២ បារាំង៣ គេចាយលុយដុល្លាអាមេរិកាំង។ អ្នកនាំផ្លូវគេបានបង្ហាញផែនទីក្រុងទាំងមូលណែនាំចេញដំណើរពីអាគារដ៏ធំសម្បើមមួយប្រកបដោយក្បាច់រចនាជាប្រាសាទស្តេចសោយរាជ្យលំអរដោយសួនឧទ្យានធំៗមានផ្កាចម្រុះពណ៌ និងអាងបាញ់ទឹក នៅលំអរផ្លូវខ្វែង គួរឱ្យចង់គយគន់។ ក្នុងអាគារនោះមាន "កាស៊ីណូ" ទំនើបមួយមានហាងលក់ដូរកំរិតខ្ពស់មានសណ្ឋាគារមានភោជនីយដ្ឋានផ្កាយ៥មានសារមន្ទីរសត្វសមុទ្រដ៏ធំអស្ចារ្យមួយដែលបើមានទេសចរណាចូលទៅហើយ នឹងនៅទស្សនាច្រើនម៉ោង ទើបចេញវិញរួច។ បន្ទាប់មកគេអាចទៅទស្សនាក្រុងដែលគេសង់តាមលំនាំ "ហូលីវូដ" ដូចជាផ្ទះអ្នកស្រុកគំរូដើម ឬក៏សង់គំរូនៃដំបន់ណាមួយនៃទីក្រុង "ញូយ៉ក" ជាដើម ។ មានការលក់ដូរ ជារបស់អនុស្សាវរីយ ជាម្ហូបអាហារ ឬភេសជ្ជៈរបស់តំបន់តែពួកយើងពុំមាឱកាសសម្រាកគ្រប់គ្រាននឹងបានភ្លក់ម្ហូបចំណីទាំងនោះទេ បានត្រឹមតែស្រស់ស្រូបថ្ងៃត្រង់ជាមួយ "ហមប៊ើគ្វឺ-ហ្វ្រិនហ្វ្រាយ-ខូក" ដូចនៅ "ម៉ាក់ដូ" ឯសហរដ្ឋដូច្នោះដែរ ។ ក្រៅពីនេះការដែលត្រូវតែធ្វើមិនគួរខកខាននោះ គឺទៅងូតទឹកនៅឆ្នេរសមុទ្រដែលមានក្សាច់សក្បុស ទឹកថ្លាឆ្វង់ រលកសមុទ្របោកត្រាំងៗគួរឱ្យចង់ប្រឡែង។ នៅទីនោះ គេប្រាប់យើងថា "បាហាម៉ាស" គឺជា "ឡាគូណា" បានន័យថា គឺជាកោះដែលកើតឡើងពីការដុះគរឡើងនៃផ្កាថ្មដែលរស់នៅក្នុងសមុទ្រមានចរន្តទឹកក្តៅតែទីនោះជាកន្លែងទឹករាក់ ដីនៃផ្កាថ្មចាស់ដែលពូនរាល់ឆ្នាំនោះ ជាទូទៅបង្កើតបានជាកោះដែលមានរាងមូលមានបឹងនៅកណ្តាលមានខ្លះ ក៏មាងរាងជាស្នែងក្របីដែរ ។ ប៉ុណ្ណារ៉ូ លេងទឹកសមុទ្រនៅបឹងតូចមួយសន្ទុះ រួចហើយក៏ទៅលេងនៅឆ្នេរសមុទ្រក្រៅជាមួយសុបិនយ៉ាងរីករាយម្តាយនឹងកូនសប្បាយណាស់នឹងបេះនំប៉័ងហុចឱ្យសត្វរំពៃដែលហើរមកទទួលនំពីដៃតែម្តងរហូតដល់ពេលរៀបឥវ៉ាន់ត្រឡប់មករថយន្តវិញនាម៉ោង៤រសៀល ដើម្បីឱ្យគេជូនដំណើរមក "ន័រវេស៊ាន" វិញ។ មកដល់កប៉ាល់វិញ ក្រុមនាវិកជាជួរចាំទទួលភ្ញៀវរាប់ពាន់នាក់របស់ខ្លួនយ៉ាងរាក់ទាក់ឱ្យកន្សែងត្រជាក់ជូតមុខសាប៊ូលៀងដៃបន្ថយកានាំមេរោគត្រឡប់មកកប៉ាល់វិញផង។ មុននឹងចូលក្នុងនាវាវិញ យើងបានឆ្លងរបងអត្តសញ្ញាណប័ណ្ណរបងគយ ដូចគ្នានឹងនៅព្រលានយន្តហោះនៅពេលឆ្លងប្រទេសម្តងៗ ក្នុងប្រទេសធំៗដូច្នោះដែរ ហើយក៏មកកាន់បន្ទប់ហាត់ទន់រៀងខ្លួន។

ម៉ោង៨យប់មហានាវាសមុទ្ររំកិលខ្លួនចេញត្រឡប់ទៅសហរដ្ឋអាមេរិកវិញ មិនថយក្រោយទៅ "ហ្វ្លរីដា" សិនវិញទេ តែទៅទិសខាងជើងត្រង់សំដៅទៅរកញូយ៉កតែម្តងតម្រូវឱ្យនាវាប្រើពេល២យប់នឹង១ថ្ងៃទើបដល់ចំណតដើមវិញ ។ នៅតាមផ្លូវទឹកត្រឡប់មកវិញ យើងអង្គុយសំយាបក្រៅបន្ទប់ឃើញទឹកបែកខ្ចាយធំជាងពេលមុនៗ ហើយសម្លេងខ្ទ័រនៃគ្រឿងចក្រក៏ញ័រខ្លាំងជាងមុនដែរ ធ្វើឱ្យយើងសន្និដ្ឋានថា នាវា "ន័រវេស៊ាន" កំពុងបើកត្រឡប់ទៅចំណតលឿនជាងពេលចេញដំណើរយ៉ាងច្រើនគួសមដែរ ។ នៅលើមហានាវាក្នុង២យប់១ថ្ងៃនោះ ហាក់ដូចជាយូរណាស់ តែកម្មវិធីកំសាន្ត សិល្បៈ កីឡា ម្ហូបអាហារគ្រប់ផុនចាប់ប្តើមមិនចេះចប់នៅមាន "ស្ទូពផឹង" លើនាវាទៀត រកទិញឥវ៉ាន់ផ្ញើរមិត្តភក្រ្តក៏ស៊ីពេលណាស់ថែមទៀត ថ្ងៃនឹងយប់បានបំព្រួញពេលវេលាបានយ៉ាងឆាប់រហ័សរកទិញអ្វីក៏មិនទាន់។ បើកភ្នែកទាំងព្រលឹមអុរម៉ោង៨ព្រឹកនៃថ្ងៃអាទិត្យ ទី២២ ធ្នូ២០១៣នាវាបានចូលសំចតនៅកំពុងផែក្រុងញូយ៉កគេប្រាប់ឱ្យយើងចែកជាក្រុមដើម្បីចេញទៅធ្វើទិដ្ឋាការខាងគយនឹងអន្តោប្រវេសន៍យើងនៅក្រុមទី៤ អាចចុះពីកប៉ាល់ម៉ោង១០ព្រឹកក៏បានឬក៏ហូបបាយត្រង់ហើយក៏បានដែរ នេះដោយសារចំនួនអ្នកដំណើរច្រើនពេកមិនអាចធ្វើទិដ្ឋាការដោយនគរបាលទាន់រយៈពេលខ្លី។

គេថា "ការធ្វើដំណើរបង្កើតយុវភាព" ពាក្យនេះពិតណាស់! ពីព្រោះវាផ្តល់បទពិសោធន៍ថ្មីៗច្រើនណាស់ ដល់អ្នកដំណើរស្គាល់មនុស្សថ្មីស្គាល់ទីកន្លែងថ្មីក៏ច្រើនឥតគណនាបន្ទូរបរិយាកាសតឹងតែងឱ្យរីករាយ **តទៅទំព័រទី ២១**














## តមកទំព័រទី ១២ គណបក្សប្រជាជនចោទបក្ស...

គឺស្របច្បាប់ ព្រោះស្ថានភាពនៅថ្ងៃបោះឆ្នោត "មានភាពប្រសើរជាងការបោះឆ្នោតលើកមុនៗ ដោយសារតែវាគ្មានអំពើហិង្សាកើតឡើង និងដោយសារតែវាសេរី"។

លោក យឹម សុវណ្ណ អ្នកនាំពាក្យគណបក្សសង្គ្រោះជាតិបានឆ្លើយតបនឹងក្រសួងមហាផ្ទៃកាល

ពីថ្ងៃសុក្រដោយលើកឡើងថា វាគឺជាគណបក្សប្រជាជនទេ ដែលមិនយកចិត្តទុកដាក់ចំពោះរដ្ឋធម្មនុញ្ញ ព្រោះគណបក្សនេះបានបើកសម័យប្រជុំសភាដំបូងដោយឯកបក្ស។ សមាជិកសភាជាប់ឆ្នោតទាំង៥៥រូបរបស់គណបក្សសង្គ្រោះជាតិបានធ្វើពហិការមិនចូលរួមនៅក្នុងរដ្ឋសភាឡើយ ដើម្បីប្រឆាំងការបោះឆ្នោតដែលខ្លួនគិតថា មិនប្រក្រតីនោះ។

លោក យឹម សុវណ្ណ បានមានប្រសាសន៍ថា "រដ្ឋសភាត្រូវការគណបក្សពីរចូលរួម ប៉ុន្តែគណបក្សប្រជាជនកម្ពុជាបានប្រើគណបក្សតែមួយដើម្បីបង្កើតរដ្ឋសភា"។ លោកសួរថា "តើនរណាកំពុងតែធ្វើរដ្ឋប្រហារ។ លោកបានបន្តដោយសំដៅទៅលើកងរាជអាវុធហត្ថដែលបានបាញ់សម្លាប់អ្នកតវ៉ាចំនួនប្រាំនាក់ និងធ្វើឱ្យរងរបួសជាង៤០នាក់ អំឡុងការធ្វើកូដកម្មទ្រង់ទ្រាយធំរបស់កម្មកររោងចក្រកាត់ដេរកាលពីដើមខែមុនថា "តើនរណាជាអ្នកបញ្ជូនកងកម្លាំងទៅសម្លាប់ប្រជាពលរដ្ឋនៅផ្លូវវែងស្រេង"។

រដ្ឋាភិបាលដែលដឹកនាំដោយគណបក្សប្រជាជនកម្ពុជា ចាប់តាំងពីពេលនោះមកបានព្យួរសិទ្ធិរដ្ឋធម្មនុញ្ញស្តីពីសិទ្ធិសេរីភាពនៃការជួបជុំ ដែលអ្នកជំនាញផ្នែកច្បាប់បានលើកឡើងថា គឺជាទង្វើខុសច្បាប់នោះ។ នៅពេលត្រូវបានស្នើឱ្យពន្យល់អំពីការប៉ុនប៉ងរបស់គណបក្សសង្គ្រោះជាតិធ្វើរដ្ឋប្រហាររដ្ឋធម្មនុញ្ញឧត្តមសេនីយ៍ឯក ខៀវ សុភ័គ អ្នកនាំពាក្យក្រសួងមហាផ្ទៃបានបង្វែរសំណួរនេះទៅឧត្តមសេនីយ៍ទោ ពោ ភ័ក្រ ប្រធាននាយកដ្ឋានផ្នែកទំនាក់ទំនងនៅក្រសួងមហាផ្ទៃ ប៉ុន្តែឧត្តមសេនីយ៍ទោរូបនេះបានបង្វែរសំណួរត្រឡប់ទៅឧត្តមសេនីយ៍ឯក ខៀវ សុភ័គវិញ។

លោក ជាម យៀប សមាជិកសភាមកពីគណបក្សប្រជាជនកម្ពុជាបានលើកឡើងកាលពីថ្ងៃសុក្រថា លោកយល់ស្របតាមការវាយតម្លៃពីស្ថានភាពរបស់លោក ស ខេង ។ យោងតាមលោក ជាម យៀប បានឱ្យដឹងថា ការធ្វើរដ្ឋប្រហារមិនតម្រូវឱ្យមានកងទ័ពនោះទេ ហើយលោក សម រង្ស៊ី កំពុងតែប៉ុនប៉ងទម្លាក់រដ្ឋាភិបាលដែលដឹកនាំដោយគណបក្សប្រជាជនកម្ពុជា តាមរយៈសកម្មភាពរបស់លោកនៅអឺរ៉ុប និងសហរដ្ឋអាមេរិក ។ លោក ជាម យៀប បានថ្លែងថា "លោក សម រង្ស៊ី កំពុងតែព្យាយាមខ្ទប់ច្រមុះ មាត់ និងបំពង់ករបស់ប្រទេសកម្ពុជា ហេតុដូច្នេះហើយទំនិញផ្សេងៗមិនអាចនាំចេញពីកម្ពុជាបានឡើយ។ ប្រធានគណបក្សសង្គ្រោះជាតិកំពុង?ធ្វើរដ្ឋប្រហាររដ្ឋធម្មនុញ្ញ ហើយពួកគេកំពុងប្រឆាំងរដ្ឋធម្មនុញ្ញដែរ"។

តែទោះជាយ៉ាងណា គឺលោក សម រង្ស៊ី ទេដែលបានប្រើពាក្យថា "រដ្ឋប្រហាររដ្ឋធម្មនុញ្ញនេះ" មុននៅពេលលោកបានចោទប្រកាន់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន កាលពីខែវិច្ឆិកាថា មិនយកចិត្តទុកដាក់ចំពោះរដ្ឋធម្មនុញ្ញដោយបើកសម័យប្រជុំសភាដំបូងដោយឯកបក្សដែលមានតែសមាជិកសភាចំនួន៦៨រូបមកពីគណបក្សប្រជាជនកម្ពុជាចូលរួមប៉ុណ្ណោះ៕ **ស៊ុយឈាង**

## តមកទំព័រទី ១៣ អ្នកភូមិមានកំហឹងចាប់ឃាត់ខ្លួន...

ដំបូងឡើយ អ្នកភូមិបានស្រែកដាក់មន្ត្រីនគរបាលទាំងពីរឱ្យឈប់បង្កសំឡេងរំខាន និងឱ្យប្រយ័ត្នប្រយែងបន្តិច។ ភ្លាមនោះ មន្ត្រីនគរបាលម្នាក់ក្នុងចំណោមអ្នកទាំងពីរបានយកកាំភ្លើងខ្លីវាយអ្នកភូមិម្នាក់ជាហេតុធ្វើឱ្យអ្នកភូមិមានកំហឹងកាន់តែខ្លាំង។

លោក វណ្ណ បឿង បាននិយាយថា "ពួកគេជិះម៉ូតូធំមួយគ្រឿង និងមានកាំភ្លើងជាប់ខ្លួនមួយដើម។ មនុស្សប្រហែល៥០នាក់បាននាំគ្នាព័ទ្ធចាប់ពួកគេធ្វើឱ្យម្នាក់ក្នុងចំណោមមន្ត្រីនគរបាលទាំងពីរនាក់បាញ់កាំភ្លើងពីរគ្រាប់ឡើងលើ"។ បន្ទាប់មកនគរបាលសង្កាត់នៅក្បែរនោះក៏បានមកដល់កន្លែងកើតហេតុដោយនាំអ្នកទាំងពីរទៅប៉ុស្តិ៍នគរបាលដើម្បីធ្វើការសាកសួរ។

លោក ហង្ស វណ្ណី នាយប៉ុស្តិ៍រងទី២ មិនព្រមផ្តល់ឈ្មោះនគរបាលទាំងពីរទេ ប៉ុន្តែបានបញ្ជាក់ថា ពួកគេជានគរបាលមែន។ លោកបាននិយាយថា "ពួកគេគឺជានគរបាលថ្នាក់ទាប ពីព្រោះពួកគេមានកាំភ្លើង" ដោយបានពន្យាល់ថា អ្នកទាំងពីរបានប្រព្រឹត្តមិនគប្បីបែបនោះដោយសារពួកគេស្រវឹង។

លោក សោម លីថុល នាយការិយាល័យនគរបាលព្រហ្មទណ្ឌខណ្ឌសែនសុខបានឱ្យដឹងថា បន្ទាប់មកទៀត នគរបាលសង្កាត់បានបញ្ជូន ពួកគេបន្តទៅអធិការដ្ឋាន ហើយពេលនេះមន្ត្រីនគរបាលទាំងពីរកំពុងត្រូវបានសាកសួរនៅស្នងការដ្ឋាននគរបាលរាជធានីភ្នំពេញ៕

**សេរីរុធ**

## តមកទំព័រទី ២០ ដំណើរតាមជើងសមុទ្រ "អាត់ឡង់ទិក"...

សុខភាពក៏បានប្រសើរជាងមុន ។ ពិសេសជាងមុនៗ គឺនៅជើងដំណើរលើកនេះគ្រួសារយើងបានក្លាយទៅជាអភិជនមានអ្នកបំរើឆ្វេងស្តាំមានអ្វីៗគ្រប់គ្រាន់មិនខ្វះយើងក៏ជាគ្រួសារ "សម្បូរបែប" ត្រូវការធ្វើអ្វីក៏ពិសេសជាងគេប្រើប្រាស់អ្វីក៏ប្រណិតជាងគេហារកអ្វីបានហ្នឹងមកភ្លាម! ជាទង្វើដែលប្រទេសសង្គមនិយមចាត់ទុកថាជាកំហុសផ្ទុយទៅវិញ អារម្មណ៍ជា "អភិជនសម្បូរបែប" នៅទីនេះ តាមពិតទៅមនុស្សម្នាក់ៗប្រថ្នាចង់តែឱ្យជួបប្រទះយ៉ាងហោចណាស់ក៏បានម្តងដែរក្នុងមួយជីវិតនេះ នៅពេលដែលមានការងារធ្វើយ៉ាងហត់នឿយទាំងកាយទាំងចិត្តអស់រយៈពេលដ៏យូរខែឆ្នាំគ្មាននរណាចាប់ទោសពៃរ៍អ្វីទេ នរណាក៏អាចធ្វើដំណើរទៅបាន គឺជាការដែលគេលើកទឹកចិត្តថែមទៀត ។ លុយដែលបានចាយហាក់ដូចជាច្រើនណាស់យោងតាមភាពលំបាកនឹងសន្សំលុយបាន ក៏ប៉ុន្តែ "ដំណើរគ្រូស" ជាមួយនឹងអ្នករួមដំណើរដ៏ច្រើនពាន់នាក់ បែរជាធ្វើឱ្យដំណើរគ្រូសនេះ អាចប្រព្រឹត្តទៅក្នុងតម្លៃដែលអាចទទួលយកបានបើគ្មានអ្នករួមចំណាយទេនោះមិនអាចធ្វើដំណើររបៀបនេះជាមួយគ្រួសារម្នាក់ឯងបានឡើយ ៕



# CLASSIFIED ADS



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



របាំបុរាណខ្មែរ ដោយសាគូ សាមុត
តម្លៃ $10



រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10



ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤
តម្លៃ $10



CAMBODGE
តម្លៃ $5



អង្គការជានរណា?
បីភាគ តម្លៃ $5/1

| Name | Phone # |
|---|---|
| Shipping Address | Email |
| City, State, Zip | Book Title(s) |

## BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
**អាចទិញនៅអាស័យដ្ឋាន៖** 45 Merrimack St., Suite 218A, Lowell, MA 01852

---

**Your Bussiness**
Card is Here for $50/mon
**ពាណិជ្ជកម្មរបស់អ្នកនៅទីនេះចំណាយ ត្រឹមតែ $50 ក្នុង១ខែ**

---

ភោជនីយដ្ឋាន អប្សរាអង្គរ
Dine-In - Take-Out
Catering
APSARA ANGKOR REST.
877 WESTERN AVE
LYNN, MA 01905
TEL: (781) 477-6045
Open: Tue - Sun 10am -1am

---

DONUT CITY
781.477.0766
515 Chesnut st.
Lynn, MA 01904

---

Golden Video Shop
Providence
មានលក់ថាសចម្រៀង
និងខ្សែវីដេអូ-ខ្មែរ-ចិន-ថៃ
(401)-808-9336
VM LAPTOPS CENTER
- VANNAK MOEUN (Manager)
មានជួសជុល-ទិញ និង លក់ " ឡាបថប " គ្រប់យ៉ាង
301 Reservoie Ave.
Providence, RI 02907

---

**លក់ហាងកែសម្ផស្ស**
SALON FOR SALE
ហាងយើងខ្ញុំមានបន្ទប់បី សម្រាប់ម៉ាស្សាមុខ និងដំម្រុះរោមបញ្ចរតាំងក្រចកចំនួន៧ និងកៅអី សម្រាប់ធ្វើក្រចកចំនួន៤
**We have 3 rooms**
- facial, massage, and Waxing
- 7 Nail stations
- 4 Pedicure Chairs

We also Needed Nails Tech
សូមទាក់ទងឃឹម(KIM)
781-704-3518

---

**ប្រូវីដិនខ្មែរវីដេអូ**
មានជួសជុល និងលក់កុន
ចិន-ថៃ-ខ្មែរ-ឥណ្ឌា
គ្រប់ប្រភេទមានចម្រៀងសម័យវីដេអូ
**ខារ៉ាអូខេថ្មីៗ**
742 Potters Avenue
Providence, RI 02907
ទូរស័ព្ទ : (401) 787 6663

---

**Chheng & Associates**
- Professional Income Tax Preparation Service

ធ្វើពន្ធដារប្រចាំឆ្នាំ
Immigration Document Preparation
បំពេញឯកសារអន្តោប្រវេសន៍
@ Bamboo Garden Restaurant
*Serving:* the best Papaya Salad, Noodle Soup, & Me-Kantaing,
376 Elmwood Ave. Providence RI
(401) 996-0225, (401) 432-7002,
teechheng@hotmail.com

---

## HELP WANTED ជ្រើសរើសបុគ្គលិក

A busy Restaurant in Philadelphia
Seeking for a Chef to cook full time
Competitive salary.
ត្រូវការចុងភៅ ធ្វើការពេញម៉ោងប្រាក់ខែល្អ
ធ្វើការក្នុងភោជនីយដ្ឋាន សំបូរភ្ញៀវចេញចូល នៅហ្វីឡាដែលហ្វៀ
Please call Jimmy for details.
សូមហៅ ជីមមី **215-688-1313**

---

## Freeland Interpreter Opportunity

Lionbridge holds a contract with the Social Security Administration to provide interpreters for Disability Adjudication and Review. We are recruiting for freelance Khmer/Cambodianon-site interpreters for the Boston area.

Requirements: U.S. citizen or green card holder with some interpretation experience (preferred).

Starting rate $30/hr! Higher rates available for those with interpretation experience.If you are interested contact wasinterpresumes@lionbridge.com

# វីរៈបុរសដែលគួរចងចាំ

**ដោយ : ខ្មែរផុស**
ដកស្រង់ពីសៀវភៅប្រវត្តិសាស្ត្រកម្ពុជា និង វីរជនខ្មែរ
អ្នកនិពន្ធ សាតូ សាម៉ុត
គ្រឹះស្ថានបោះពុម្ពផ្សាយ-បណ្ណាគារ
អង្គរ ភ្នំពេញ ទូរស័ព្ទលេខ ០១២ ៤៥៥ ៨៨៥



មហានគរវិញជាបន្ទាន់ ប្រហែលជាក្នុងព្រះរាជបំណង ចង់អនុវត្ត នូវសិទ្ធិឡើងគ្រងរាជ្យរបស់ព្រះអង្គ ។ តែ លុះព្រះអង្គបានមកដល់ព្រះរាជធានីហើយ ព្រះអង្គទ្រង់ឈ្វេងយល់ថា គប្បីព្រះអង្គស្ថិតនៅស្ងៀមមួយរយៈសិន ដោយសម្ងំលាក់ខ្លួនព្រះអង្គក្នុងអនាមិក ទម្រាំស្ថានការណ៍ហុចឱកាស ដើម្បីឲ្យព្រះអង្គបញ្ចេញខ្លួនព្រះអង្គឡើងវិញ ។ សិលាចារឹកនៅភិមានអាកាស និយាយពីព្រឹត្តិការណ៍នេះថា : "ក្រោយពី ព្រះបាទយសោវរ្ម័ន បានត្រូវខ្មាំងពានរាជ្យ ដណ្តើមយកព្រះរាជសម្បត្តិ និង ប្រហារជីវិតបង់ ព្រះបាទជ័យវរ្ម័ន បានគង់សណ្ឋិតនៅក្នុងប្រទេស រង់ចាំឱកាស ដើម្បីរំដោះទឹកដី ដែលធ្ងន់ដោយ ឧក្រិដ្ឋកម្ម"។ ក្នុងកំឡុងការរង់ចាំដ៏យូរលង់នេះ ព្រះរាជនី ព្រះនាង ជ័យរាជាទេវី ដែលជាអ្នកគោរពបូជាព្រះពុទ្ធសាសនាដ៏ជ្រាលជ្រៅ បានសុខព្រះទ័យ ធ្វើព្រះទុក្ករកិរិយាយ៉ាងយូរអង្វែង ដើម្បីជួយព្រះស្វាមីឲ្យមានជោគជ័យ ក្នុងការរំដោះប្រទេសជាតិ ឲ្យបានគេចផុតពីកណ្តាប់ដៃស្តេចពានរាជ្យ" ។ ព្រះទុក្ករកិរិយានេះ ត្រូវបានសិលាចារឹកភិមានអាកាស បរិយាយដ៏វែងអន្លាយ : "ដោយការគោរពបូជាចំពោះព្រះស្វាមី ព្រះទេវក្សត្រីយ៍នេះ បានបន់ស្រន់សុំឲ្យព្រះស្វាមី រំដោះទឹកដីឲ្យផុតរួចគេចពីជម្រៅ នៃមហាសមុទ្រគ្រោះអាសន្ន" ។ ក្រោយពីការវាយលុកកាន់កាប់ព្រះរាជធានី នៃ ទ័ពចាម ព្រមទាំង ការបាត់បង់ជីវិត នៃ ព្រះចៅ ត្រីភូវនទិត្យវរ្ម័ន ព្រះបាទជ័យវរ្ម័ន ទ្រង់ឈ្វេងយល់ថា ឱកាសដែលរង់ចាំ បានហុចមកហើយ ។ គ្រានោះ ព្រះអង្គបានកេនលើកទ័ពទៅវាយទ័ពឈ្លានពានចាម ជាច្រើនកន្លែង ដោយជោគជ័យ តែជ័យជំនះជាកំហិត គឺជ័យជំនះដែលព្រះអង្គដណ្តើមបានពីទ័ពចាមនៅលើទន្លេសាប ដែលជាសញ្ញា នៃ ការរំដោះប្រទេសជាតិ ពីក្រញាំចាម ជាស្ថាពរ ។ មហាជោគជ័យ ខាងជើងទឹកនេះ ជាឱកាសដែលធ្វើឲ្យព្រះអង្គបានសងសឹកទៅលើទ័ពចាម ដោយព្រះអង្គ បានកំទេចនូវនាវាចរ ដែល ៤ ឆ្នាំ មុន ជាមធ្យោបាយនាំឲ្យខ្មាំងអាចចូលមកកាន់កាប់ព្រះរាជធានីបាន ។ យុទ្ធនាការនេះ បានត្រូវចម្លាក់ប្រាសាទបាយ័ន និង បន្ទាយឆ្មារ និយាយរៀបរាប់ដោយល្អិតល្អន់ ។ នៅឆ្នាំ ១១៨១ ក្រោយពីព្រះអង្គបានរំដោះប្រទេសចប់សព្វគ្រប់ហើយ ទើបព្រះអង្គរៀបចំពិ រាជាភិសេកឡើងគ្រងរាជ្យ ។ បន្ទាប់ពីនោះភ្លាម ព្រះអង្គទ្រង់បានរៀបចំជួសជុលទីក្រុង ដោយគ្មានបង្អង់ ព្រមទាំង ស្ថាបនាព្រះរាជធានីឡើងវិញ ដែលនឹងមានឈ្មោះថា អង្គរធំ ឬ មហានគរ ។

### ៣- សង្គ្រាមសងសឹកចំពោះប្រទេសចាម ពីសំណាក់ ព្រះបាទជ័យវរ្ម័ន ទី៧

បើតាមអ្នកដំណើរចិន ម៉ាត្វាន់-លីន ព្រះបាទជ័យវរ្ម័ន ទី៧ បានសច្ចាថា នឹង "វាយដណ្តើមយកជ័យ លើប្រទេសចាម ឲ្យបានត្រចះត្រចង់រន្ធឺខ្ទរខ្ទារ ។ សច្ចាប្រណិធាននេះ ព្រះអង្គបានសំរេច ក្រោយពីព្រះអង្គបានរង់ចាំអស់រយៈពេល ១៨ ឆ្នាំ" ។ នៅឆ្នាំ ១១៩០ ក្រោយពីព្រះអង្គបានទទួលការធានាពីអព្យាក្រឹតភាព ពីប្រទេសដៃវៀត ឱកាសបានហុចឲ្យព្រះអង្គ នៅគ្រាដែល ព្រះបាទជ័យាឥន្ទ្រវរ្ម័ន ដែលជាព្រះចៅចាម បានលើកទ័ពមកវាយ ប្រទេសកម្ពុជា សារជាថ្មី ។ នៅក្នុងពេលនោះ ព្រះបាទជ័យវរ្ម័ន ទី៧ ដោយមានព្រះអង្គម្ចាស់ចាម ដែលព្រះអង្គបានអប់រំនៅក្នុងព្រះរាជវាំង ហើយប្រទានងារជាព្រះយុវរាជា ជាអគ្គសេនា អម ផង បានវាយលុកចូលក្នុងប្រទេសចម្ប៉ា យកបានទីក្រុងវិជ័យា ព្រមទាំង រឹបអូសយកលិង្គព្រះសិរៈ បញ្ជូនមកមហានគរទាំងអស់ ។ រួចហើយ ព្រះអង្គបានតែងតាំងព្រះអនុជថ្លៃ ព្រះនាម អ៊ិន ឲ្យសោយរាជ្យនៅទីក្រុងវិជ័យា ។ តែ ក្រោយមក នៅឆ្នាំ ១១៩២ ព្រះយុវរាជាចាម ខាងលើ បានឆ្លៀតឱកាសពីការបះបោរដេញកំចាត់ស្តេចខ្មែរ បំផុសឲ្យមាន ឯករាជ្យ និង ឯកភាព ប្រទេសចម្ប៉ា ឡើងវិញ ហើយឡើងគ្រងរាជសម្បត្តិនៅវិជ័យា ។ អតីតស្តេចចាម ដែលត្រូវជាឈ្លើយនៅមហានគរ ហើយដែល ព្រះបាទជ័យវរ្ម័ន ទី៧ បញ្ជូនឲ្យមកបង្ក្រាប ស្តេចថ្មីនេះ បានត្រូវស្តេចនេះប្រហារជីវិតបង់ ។ ព្រះបាទជ័យវរ្ម័ន ទី៧ ទ្រង់នៅរង់ចាំរហូតដល់ឆ្នាំ ១២០៣ ទើបព្រះអង្គដេញកំចាត់ស្តេចនេះបាន ដោយទទួលការស៊ីគ្រលំពីឪពុកមា របស់ស្តេចនេះ ព្រះនាម អុងដាណាបតិក្រាមា ។ ពីឆ្នាំ ១២០៣ រហូតដល់ឆ្នាំ ១២២០ ប្រទេសចាម ត្រូវស្ថិតនៅជាអាណាខេត្តមួយ នៃ ព្រះអធិរាជាណាចក្រខ្មែរ ។ នៅឆ្នាំ ១២០៧ ព្រះរាជបុត្រចាម មួយព្រះអង្គ ដែលបានទទួលការអប់រំនៅមហានគរ បានត្រូវទទួលព្រះរាជបញ្ជាលើកទ័ពទៅវាយប្រទេសដៃវៀត ។ នៅក្នុងទ័ពឈ្លានពាននេះ មានផ្នែកទ័ព ភូមា និងសៀម លាយចំរុះផង ។ នៅឆ្នាំ ១២២៦ ព្រះរាជបុត្រនេះ ឡើងគ្រងរាជសម្បត្តិនៅប្រទេសចម្ប៉ា ក្នុងព្រះនាមថា ជយាបរមិស្វរវរ្ម័ន ទី២ ។ នៅក្នុងរជ្ជកាលស្តេចនេះ អារ្យធម៌ខ្មែរជះឥទ្ធិពលច្រើន ទៅក្នុងប្រទេសចម្ប៉ា ។

### ៤-ឫទ្ធិអំណាចខ្មែរបានឡើងខ្ពស់ដល់កំរិត ក្នុងរជ្ជកាល ព្រះបាទជ័យវរ្ម័ន ទី៧

ព្រះបាទជ័យវរ្ម័ន ទី៧ បានពង្រីកទឹកដីខ្មែរជាអតិបរិមា ទៅទិស ខាងជើង និងខាងលិច ។ គឺនៅក្នុងរជ្ជកាលព្រះអង្គនេះហើយ ដែលខ័នសីមាព្រះអធិរាជាណាចក្រ បានរីកធំដល់កំរិត ដូចដែលសិលាចារឹកនៅ សាយផុង នៅខាងមុខក្រុងវៀងចន្ទ ចង្អុលជាតឹកតាងស្រាប់ ។ អធិបតីភាពប្រទេសខ្មែរកាលនោះ លាតសន្ធឹងទៅលើប្រទេសលាវ ទៅលើប្រទេសសៀម សព្វថ្ងៃនេះ ទាំងមូល ទៅលើជ្រោយម៉ាឡាយូ រហូតដល់កណ្តៀបក្រា និង ទៅលើប្រទេសភូមា រហូតដល់ទន្លេសាឡូវិន ។ ដោយហេតុនេះហើយ បានជាគេសង្កេតឃើញមានទ័ព ភូមា និង សៀម នៅក្នុងជួរទ័ពខ្មែរ ដែលបញ្ជូនឲ្យទៅវាយប្រទេសដៃវៀត ពីឆ្នាំ ១២០៧ ។ សិលាចារឹកព្រះខ័ន នៅឆ្នាំ ១១៩១ និយាយថា ទឹកសំរាប់សំអាតសារពាំងកាយ (សញ្ញា នៃ ការចុះចាញ់) ត្រូវបានផ្តល់មកថ្វាយ ព្រះបាទជ័យវរ្ម័ន ទី៧ ពីសំណាក់ "ព្រាហ្មណ៍ ដែលមាន សូរិយាភ័តា ជាអាទិ៍ ពីសំណាក់ ស្តេចជ្វា ស្តេចយាវនៈ (ប្រទេសដៃវៀត) និង ស្តេចចាមទាំងពីរ" ។

### ៥- ព្រះរាជសំណង់

ព្រះបាទជ័យវរ្ម័ន ទី៧ ទ្រង់ជាកសិណា ដែលមិនអាចធ្វើអ្វីកើត ពេលចាមវាយកាន់កាប់ព្រះរាជធានី នាឆ្នាំ ១១៧៧ ។ ព្រះអង្គទ្រង់យល់ថា ការ ការពារព្រះរាជធានីតាមជំនឿសាសនា មិនបានទទួលប្រសិទ្ធិភាពគ្រប់គ្រាន់ឡើយ ហើយគប្បីត្រូវបន្ថែមឥទ្ធិពលជំនឿសាសនា បន្ថែមទៀត ។ ជំនឿនេះ បានត្រូវពង្រឹងក្នុងន័យនេះ ដោយហេតុព្រះអង្គផ្ទាល់ មានជំនឿស៊ប់ ទៅលើអង្គព្រះពុទ្ធ ។ រហូតមកទល់នឹងពេលនេះ គឺមានតែព្រះអង្គមួយអង្គទេ ដែលបានទុកសំណាករូបចម្លាក់ខ្លួនព្រះអង្គ ឲ្យយើងបានស្គាល់ ។ រូបចម្លាក់នេះ បង្ហាញព្រះអង្គស្ថិតនៅក្នុងស្ថានភាពសមាធិធម៌ ។ ដោយហេតុនេះហើយ បានជាមិនយូរប៉ុន្មាន ក្រោយពីព្រះពិធីរាជាភិសេក ព្រះអង្គបានអនុវត្តមិនឈប់ឈរ នូវគំរោងសំណង់ដ៏ធំធេងរបស់ព្រះអង្គ សម្រាប់ក្នុងផ្ទៃប្រទេស និង នៅក្នុងទីក្រុងដែលព្រះអង្គដាក់ឈ្មោះថា ជា "នគរជ័យស្រី" (= ក្រុង មានជ័យភ័ព្វ) ។ គឺជា អង្គរទី ៣ ឬ អង្គរធំ ដែលសង់ដោយសម្រួបតាម ប្រាសាទបាយ័ន ជាស្នូលកណ្តាល ហើយដែលមានជញ្ជាំងដ៏ធំ ហ៊ុំព័ទ្ធជុំវិញ ជាមួយនឹងខ្សែក្រវាត់ទឹក ។ **តទៅលេខក្រោយ**

## សប្តាហ៍សម្រាប់កុមារឡូវែល Lowell Kids Week

**ដោយ : ចេមអសទីស**
**ប្រែសម្រួលដោយ : សុខា**

កម្មវិធីបុណ្យរដូវរងារចុងសប្តាហ៍ខាងមុខនេះត្រដមត្រសងគ្នានឹងកម្មវិធីសប្តាហ៍សម្រាប់កុមារឡូវែលដែលជាកម្មវិធីផ្តល់ជូន៥០សកម្មភាពចំនួនមួយសប្តាហ៍ពេញដល់កុមារអំឡុងវិស្សមកាលរយៈពេលខ្លី ចាប់ពីថ្ងៃទី ១៧ ដល់ថ្ងៃទី២៣ កុម្ភៈ។ កម្មវិធីនេះសហការជាដៃគូជាមួយមជ្ឈមណ្ឌលសួនប្រវត្តិសាស្ត្រនៃតំបន់ឡូវែល។ រាល់កុមារឡូវែលទាំងអស់អាចចូលរួមកម្មវិធីនេះ ដោយឥតគិតថ្លៃ ប៉ុន្តែមានកម្មវិធីមួយចំនួនដែលតម្រូវឱ្យមានការចុះឈ្មោះជាមុន និងមានកន្លែងកំណត់។ ព័ត៌មានបន្ថែម សូមចូលកាន់គេហទំព័រ www.lowellkidsweek.org



Winterfest weekend actually coincides with the conclusion of Lowell Kids Week, a weeklong series of 50 community-wide activities during school vacation from February 17th to 23rd. Lowell Kids Week is a partnership of several community organizations including Lowell National Historical Park. All Lowell Kids Week programs are free of charge, but many have limited space and require pre-registration. More information on Kids Week Activities can be found at www.lowellkidsweek.org.

# កម្រងរូបថតអនុស្សាវរីយ៍ ខ្មែរពុស ប្រេសក្លិប











# អភិបាលរដ្ឋម៉ាសាឈូសេត ផាទ្រិក ធ្វើទស្សនកិច្ចមកកាន់ឡូវែល




**ដោយ : ចេមអសទីស**
**ប្រែសម្រួលដោយ : សុខា**

មន្ត្រីរដ្ឋាភិបាលប្រចាំរដ្ឋម៉ាសាឈូសេត លោក ដេវ៉ល ផាទ្រិកបានធ្វើទស្សនកិច្ចមកកាន់ឡូវែលនាថ្ងៃទី៤ កុម្ភៈ ឆ្នាំ ២០១៤ ហើយលោកបានឱ្យតម្លៃខ្ពស់ក្នុងទស្សនកិច្ចនេះ ដល់តំបន់ឡូវែល គួរជាទីមោទន។

លោកបានធ្វើទស្សនិច្ចអតីតរោងចក្រឧស្សាហកម្មនៅអគារវ៉ំណាលេនស៊ីត ដើម្បីណែនាំដល់សេនបក្សនិងផ្ដល់ជូនដល់សហគ្រិនឡូវែលនូវរង្វាន់ជាជំនួយថវិការ១៥ម៉ឺនដុល្លារក្នុងគោលដៅពង្រឹង និងពង្រីកកម្មវិធីមគ្គុទេសក៍ជួយដល់ម្ចាស់ជំនួញតូចក្នុងក្រុងឱ្យកាន់តែរឹងមាំឡើង ហើយដែលកម្មវិធីជំនួយក្រុមជំនួញតូចនេះ ជាកិច្ចការព្យាយាមកសាងឡើង ដោយសេនបក្សកន្លងមក។

នឹងមានការរៀបចំការប្រកួតមួយធ្វើឡើងដោយសេនបក្សនៅថ្ងៃទី១៨ កុម្ភៈ ខាងមុខនេះ ប្រកួតជ្រើសរើសគំនិតច្នៃប្រឌិតអភិវឌ្ឍជំនួញថ្មីចំនួន៤០ ហើយកម្មវិធីនេះនឹងប្រព្រឹត្តទៅនៅអគារវ៉ាណាលេនស៊ីតអាស័យដ្ឋាន Wannalancit Mills, 175 Cabot st, Suite 100 ក្នុងឡូវែល។ ព័ត៌មាននៃការប្រកួតនឹងផ្សាយនៅខែ មេសា ក្នុងគេហទំព័រ www.mvsand-box.org

លោកមន្ត្រីរដ្ឋាភិបាល ផាទ្រិក ក៏មានប្រសាសន៍ដូច្នេះថា យើងត្រូវការឱ្យប្រជាជនម្ចាស់ជំនួនទទួលខុសត្រូវខ្ពស់ គួរបផុំនឹងភាពសោមនស្សរបស់ពួកគេក្នុងការប្រកបជំនួញ ធ្វើដូចនេះ ទើបអាចប្រឈមនឹងឧបសគ្គមានគំនិតដោះស្រាយរកច្រកចេញនឹងធ្វើឱ្យជំនួញរបស់ពួកគេជោគជ័យមិនក្ស័យធនមានសេដ្ឋកិច្ចល្អប្រសើរ និងផ្ដល់ឪកាសរីកចំរើនដល់សហគមន៍និងមនុស្សគ្រប់រូប។ ទាំងនេះគឺជាអ្វីដែលយើងប្រាថ្នាចង់ឃើញ ហើយយើងពេញចិត្តធ្វើជាកាតាលិករនៃភាពជោគជ័យនេះ៕



# Governor Patrick touts entrepreneurship, Sandbox, in visit to Lowell

**By James Ostis**

One of the central tenets of the Merrimack Valley Sandbox's Accelerator program is the importance of pairing emerging entrepreneurs with knowledgeable and experienced mentors. During his visit to Lowell on February 4th, Massachusetts Governor Deval Patrick showed that he and his administration recognize that importance wholeheartedly.



Governor Patrick visited the Sandbox office at the Wannalancit Mills to present the Sandbox and two other organizations (InteriseInc and Valley Venture Mentors) grant awards under the Massachusetts Technology Collaborative's Innovation Mentoring Initiative. The Sandbox will receive $150,000 to strengthen and expand their mentor program for entrepreneurs by hiring two additional 'Managers of Mentorship.' The funds will also be used to enhance communication between mentors and entrepreneurs and raise awareness of Sandbox programs in the region.



Noting the importance of entrepreneurship in encouraging economic activity, the governor said, "This type of innovation is what our state is known for, but it has been done in one area of concentration. It's time to spread that attitude outside Greater Boston."The Sandbox's work in the Merrimack Valley was cited as an example of an organization achieving that goal.

After announcing the awards, Governor Patrick participated in an hour-long roundtable discussion with the current Accelerator class moderated by Sandbox executive director, David Parker. The wide-ranging exchange touched on ways state government can help support innovation in the Commonwealth as well as the importance of the networks that have been formed through the work of the Sandbox. The governor also took a personal interest in the "diverse range of ventures" represented by the members of the Accelerator class, engaging in discussions with the entrepreneurs and mentors present about their businesses and ideas.

This group represents the third class of the Sandbox Accelerator program, which had its first cohort last winter and has already helped over 40 innovative startups in the region, including several with strong ties to Lowell's Cambodian population.Hundreds more have participated in Sandbox pitch contests held at various times throughout the year. The Sandbox Consumer IdeasPitch Contest will be on Tuesday February 18th at the Wannalancit Mills, 175 Cabot St,Suite 100 in Lowell. Information about applying for the Summer Accelerator program will be available in April at www.mvsand-box.org.

Expressing disappointment that he had to leave the discussion to go to another engagement, the governor stated he was very impressed with what he encountered during his visit to the Sandbox and was optimistic about the innovative opportunities these mentoring grants will support. "We need people to take charge of their own passions, their own ideas, and to help us build a better economy and a stronger range of opportunities for everybody as we do so. That's happening here and I'm happy to be a part of it."




The City of Lowell is seekingqualified candidates for the position of City Manager as the Chief Administrative Officer of the City, directly responsible to the City Council, under a plan E government.

The successful candidate should have a strong managerial and municipal background with excellent written, oral skills and fiscal abilities. The position requires a Bachelor's degree in Public Administration, Business Administration, or a related field and at least 5-7 years of executive management experience. A Master's Degree is highly preferred and /or comparable government industry experience. Municipal management experience preferred.

**Salary: Negotiable**

A full description is available on the City of Lowell's Website: http://www.lowellma.gov/humanrelations/Pages/General/CityJobs.aspx Applicants should send a resume, cover letter, and 3 references to City Council c/o Mary Callery, Human Relations Director, City of Lowell Human Relations Office, Room 19, 375 Merrimack St, Lowell, Mass. 01852 by 4:00PM February 28,2014.The City is an EOE/AA/504 Employer.

# ផ្លែប៉ោម ចេក និងក្រូច ការពាររោគខ្សោយខួរក្បាល

កាលបើគេពោលពីរឿងសុខភាពភ្លាមមនុស្សក្នុងបច្ចុប្បន្ននេះ ភាគច្រើនណាស់ដែលបានផ្តោតយកចិត្តទុកដាក់ទៅលើបញ្ហាសុខភាព ព្រោះថាក្រៅពីមានជាតិពុលនៅក្នុងបរិស្ថានហើយនោះក៏មានជាតិពុលដទៃទៀត នៅក្នុងបន្លែព្រមទាំងផ្លែឈើធ្វើឱ្យសុខភាពរាងកាយកាន់តែចុះទ្រុឌទ្រោមមួយថ្ងៃបន្តិចៗជារឿយៗ ។



មហាវិទ្យាល័យគ័រណេលដ៏ល្បីល្បាញមួយរបស់អាមេរិកាំងបានរកឃើញនៅក្នុងការសិក្សាស្រាវជ្រាវថ្មីៗកន្លងទៅនេះថា ការបរិភោគផ្លែឈើ ជាពិសេសចំពោះក្រូច ចេកអំបូង និងផ្លែប៉ោម បានរៀងរាល់ថ្ងៃនោះ វាអាចជួយបញ្ចៀសរោគខ្សោយខួរក្បាលអាស៊ីមីរ និងរោគខ្សោយខួរក្បាល អាល់ស៊ីមីរ និងរោគស្លាប់មួយចំហៀងខ្លួនបាន ។

លោកសាស្ត្រាចារ្យ ចាង វ៉ាយលី ប្រធានក្រុមអ្នកពិសោធន៍នៃគ្រោងការខាងលើនេះ បានបង្ហាញហេតុផលថា នោះក៏ព្រោះសារជាតិដែលមានប្រសិទ្ធភាព ជាអ្នកលាងជំរះជាតិពុលនៅក្នុងផ្លែឈើអស់ទាំងនោះ ជួយឱ្យសរសៃប្រសាទបាត់បង់កាន់តែតិចចុះ ។ ផ្លែឈើទាំង៣ប្រភេទនេះចាត់ទុកថា ជាផ្លែឈើចំបងក្នុងអាហាររបស់មនុស្សលោកខាងលិច និងអាស៊ុីស្រាប់រួចមកហើយ ។

លោកសាស្ត្រាចារ្យ ចាង បានបង្ហើបពីហេតុផលនៃរោគ អាល់ស៊ីមីរ ឱ្យដឹងបន្តទៀតថា នោះក៏ព្រោះកោសិកាបានទទួលគ្រោះថ្នាក់ធ្វើឱ្យបំពេញការងារកាន់តែតិចចុះ ។ លើសពីនោះទៅទៀត វាបានធ្វើឱ្យសរសៃប្រសាទចុះខ្សោយទៀត ផង ។ យើងបានធ្វើការសិក្សាស្រាវជ្រាវហើយ រកឃើញតំរុយថា ការបរិភោគផ្លែឈើស្រស់គឺជាកត្តាមួយដ៏សំខាន់ ដែលជួយកាត់បន្ថយរោគាភ័យពីរោគដែលកើតចេញមកពីសរសៃប្រសាទចុះខ្សោយបានយ៉ាងមានប្រសិទ្ធភាពបំផុត ៕

តមកពីទំព័រទី ១១

## សារព័ត៌មាននៃជាតិពន្ធ និងឡូវែល

កាសែតខ្មែរផុសស.រ.អាបានបំពេញតួនាទីដូចគ្នាដែរ សម្រាប់សហគមន៍ខ្មែរប្រៀបប្រដូចទៅនឹងសារព័ត៌មានបារាំង"ឡេ-ត-ឡឺ"ដូច្នេះដែរ ។ អ្នកចំណូលថ្មីក្នុងតំបន់នៃសហគមន៍យើងតែងតែចាប់អារម្មណ៍ទៅលើវិស័យព័ត៌មាន ហើយផ្តោតលើប្រទេសរបស់ពួកគេដែលពួកគេមានប្រភពមកពី ហើយព័ត៌មានក៏ផ្សព្វផ្សាយក្នុងពិភពលោកសារព័ត៌មាន ។ សារព័ត៌មានដូចជាខ្មែរផុស ស.រ.អាបានរក្សាភាសា, ទំនៀមទំលាប់, វប្បធម៌, និងប្រពៃណីនៃអ្នកអានរបស់ខ្លួន ។ ប្រហែលជាមួយនៃបេសកកម្មដ៏សំខាន់ដែលសារព័ត៌មានរបស់ជាតិពន្ធធ្វើក្នុងគោលដៅជួយអ្នកអានរបស់ខ្លួនឱ្យបានយល់ និងក្លាយជាជនដែលសកម្មក្នុងសហគមន៍ ពោលគឺក្នុងសមាគមនៃផ្ទះថ្មីរបស់ពួកគេ ជាពិសេសគឺវិស័យនយោបាយ ។

ភាគច្រើននៃអន្តោប្រវេសន៍ដែលមកកាន់សហរដ្ឋអាមេរិក ឬពីទីកន្លែងដែលមានការរិះគន់ផ្នែកនយោបាយ ហើយអ្នករិះគន់ត្រូវក្លាយជាជនរងគ្រោះ និងជាប់ពន្ធនាគារ ឬស្លាប់ ។ នេះជាសត្យានុម័តដែលបានកើតឡើងពិតប្រាកដក្នុងសម័យសម្លាប់រង្គាល ។ ដូចនេះក៏អាចយល់បានថា ប្រជាជនខ្មែរតែងមានឥរិយាបថបង្ការខ្លួនឱ្យចេញឆ្ងាយមិនចង់ពាក់ព័ន្ធ និងនយោបាយ ។

ប៉ុន្តែនៅអាមេរិកការរិះគន់ គឺអាចធ្វើទៅបាន ។ តម្លៃនៃប្រជាធិបតេយ្យ គឺជាឫសគល់នៃគំនិត ។ នៅពេលដែលគ្រប់គ្នាបញ្ចេញមតិយោបល់នោះគោលការណ៍ដែលកំណត់សម្រាប់មនុស្សរាល់គ្នា ក៏ចេញលទ្ធផលដោយផ្លែផ្កាឆ្លើយតបតម្រូវការ ។ តែជាអកុសល់ទោះនៅអាមេរិកក៏ដោយក៏នយោបាយបង្ហាញខ្លួនដោយភ្ជាប់នឹងតម្លៃមកជាមួយដែរ ។ រាល់អ្នកទាំងឡាយដែលកាន់អំណាចជាមនុស្សមានសាច់ឈាមជាបុគ្គលដែលងាយនឹងរងការអាក់អន់ចិត្តពេលដែលមានការរិះគន់ ។ មានមួយចំនួនតូចនៃអ្នកនយោបាយដាក់ទោសអ្នករិះគន់ (ឬអ្នកគ្មានកំហុស) ដែលជាក្រុមគ្រួសាររបស់អ្នករិះគន់ ។ ប៉ុន្តែគ្មានអ្នកណាដែលត្រូវបានចាប់ខ្លួន ឬកាត់ទោសឡើយ ។ តែសំណាងល្អភាគច្រើននៃអ្នកដឹកនាំនយោបាយនៅអាមេរិក ក៏ចេះយល់ថា ការរិះគន់គឺជាតម្លៃមួយនៃប្រជាធិបតេយ្យ និងខំតទល់រកការកែប្រែចំណុចខ្វះខាតដែលបានរិះគន់ ហើយវាជាសភាពល្អមួយដែលគ្រប់សម្លេងក្នុងសហគមន៍ត្រូវបានទទួលដឹងឮ ។

ដើម្បីជួយដល់ប្រជាជនខ្មែរនៅឡូវែលឱ្យបានបញ្ចេញសម្លេងក្នុងនយោបាយនៃតំបន់ឡូវែលកាសែតខ្មែរផុសបម្រើនូវសេវាព័ត៌មាន និងជាអ្នកនាំសារយ៉ាងល្អប្រសើរនៅក្នុងសហគមន៍ ៕

Continued from Page 11

## The Ethnic Press and Lowell

Perhaps the most important mission of an ethnic newspaper is to help its readers understand and become involved in their new community, especially its politics.

Many immigrants come to America from places where criticizing political leaders leads to imprisonment or death.



This was certainly true for those who survived the Killing Fields so it is understandable that people from Cambodia would avoid involvement in politics. But that is not how America works. The essence of our democracy is the clash of ideas. When everyone speaks up, the policies that are best for all will result. Unfortunately even here political involvement comes with a price. Those who hold power are human beings and can be sensitive to criticism. A few try to punish their critics (or even innocent family members of their critics) but no one is arrested or executed. Fortunately most political leaders understand that criticism is part of the democratic process and take it in stride which is good because we are a much better city when all voices are heard. By helping the Cambodian people of Lowell make their voices heard by city government, the Khmer Post USA is performing a great service to the entire community.



# ជោគជតារាសីលោកអ្នក

## ទាំង១២ប្រចាំឆ្នាំរោង

### ឆ្នាំជូត



លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍

### ឆ្នាំឆ្លូវ



ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំខាល



រាល់ការបំពេញការងារទាំងឡាយ លោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានៈចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

### ឆ្នាំថោះ



អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរ នៅទីណាក្ដីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំរោង



រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំម្សាញ់



លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំមមី



លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះវាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហា ពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំមមែ



រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀត ឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់បើ អាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំវក



រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

### ឆ្នាំរកា



លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្ដីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្ស តាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំច



រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្ដល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់ គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕

### ឆ្នាំកុរ



នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

# វិធីកាត់បន្ថយជំងឺមហារីក

**ការស្រាវជ្រាវបានបញ្ជាក់ឱ្យដឹងថា មហារីកផ្លូវអាហារមហារីកលំពែងមហារីកពោះវៀនមហារីកសុដន់ក្រោយពីការអស់រដូវមហារីកតម្រងនោម និងមហារីក.កស្បូនសុទ្ធតែមានទំនាក់ទំនងទៅនឹងការលើសទម្ងន់ ។ ដូច្នេះដើម្បីកាត់បន្ថយជំងឺមហារីកទាំងអស់នោះ លោកអ្នកគួរតែព្យាយាមអនុវត្តវិធីងាយៗដូចខាងក្រោមនេះ ។**

**១. ហាត់ប្រាណឱ្យបាន៣០នាទីក្នុងមួយថ្ងៃ :** នេះជាវិធីការពារពីជំងឺមហារីកយ៉ាងសន្សំសំចៃបំផុត គ្រាន់តែហាត់ប្រាណ៣០នាទីជារៀងរាល់ថ្ងៃមួយសប្តាហ៍៥ថ្ងៃក៏បាន ដូចជាការដើរ រាំជិះកង់ឡើងកាំជណ្តើរ កីឡាគ្រប់ប្រភេទបានទាំងអស់ ។ ការហាត់ប្រាណអាចសម្រួលដល់ អ័រម៉ូនតេស្តូស្តេរ៉ុន និងអ័រម៉ូនអេស្ត្រូជេននៅក្នុងឈាម ។ ស្ត្រីដែលបានហាត់ប្រាណទៀងទាត់ និងសមរម្យអាចកាត់បន្ថយអត្រាកើតមហារីកកន្សោមកូន៣០% ។

**២. ទទួលទានតែបៃតង :** តែបៃតងអាចជួយការពារពីជំងឺមហារីក ដែលត្រូវបានគេបញ្ជាក់តាំងពីយូរមកហើយ ពីព្រោះនៅក្នុងតែបៃតងរួមមានសារជាតិការពារបម្រែបម្រួលអុកស៊ីតកម្ម ដោយសារធាតុទាំងនោះមានវីតាមីន A និង C នៅក្នុងតែបៃតងច្រើនជាងគេ ។

**៣. បន្លែ និងផ្លែឈើស្រស់ :** ការស្រូបយកសារជាតិសែលុយឡូសពីបន្លែផ្លែឈើ បានគ្រប់គ្រាន់ជារៀងរាល់ថ្ងៃ អាចកាត់បន្ថយអត្រាកើតជំងឺមហារីកជាច្រើនប្រភេទ ដូចជាមហារីកសុដន់, មហារីកប្រព័ន្ធរំលាយអាហារ ។ ក្រៅពីនេះសារជាតិសែលុយឡូសអាចកាត់បន្ថយកត្តាដែលធ្វើឱ្យកើតមហារីកនៅក្នុងពោះវៀន លោកអ្នកគួរតែទទួលទានបន្លែ ផ្លែឈើស្រស់១ពី៥ទៅ៧មុខជារៀងរាល់ថ្ងៃ ។

**៤. កាត់បន្ថយអាហារដែលមានជាតិខ្លាញ់ :** នៅក្នុងកត្តាទំនាក់ទំនងនៃអាហារដែលធ្វើឱ្យកើតជំងឺមហារីក គឺខ្លាញ់ ជាពិសេសគឺបណ្តាលឱ្យកើតជំងឺមហារីកសុដន់មហារីកពោះវៀនធំ និងមហារីកក្រពេញប្រូស្តាត ។ បើចង់ពិសាខ្លាញ់តិចត្រូវជ្រើសរើសទឹកដោះគោស្រស់ ដែលមានជាតិខ្លាញ់ទាប ឬគ្មានខ្លាញ់ ឬប្រើប្រភេទសណ្តែក ឬអាហារធ្វើពីសណ្តែកមកជំនួសសាច់ខ្លះៗ ហើយកុំទទួលទានសាច់ខ្លាញ់ គួរតែទទួលទានអាហារចម្អិនដោយចំហុយជំនួសឱ្យការចៀន បំពង ។

**៥. កុំទទួលទានសាច់ក្រហមច្រើនពេក :** អ្នកបរិភោគសាច់ជ្រូក សាច់គោ សាច់ពពែក្នុងបរិមាណច្រើន មានអត្រាគ្រោះថ្នាក់ក្នុងការកើតជំងឺមហារីកពោះវៀនធំច្រើនជាង៣០% ។ ដូច្នេះគួរតែកាត់បន្ថយការទទួលទានអាហារអាំង ឬផលិតផលសាច់កញ្ចប់ ដូចជាពោះវៀន ជ្រូក ភ្លៅមាន់ សាច់ជ្រូកបីជាន់ ។



**៦. ផ្តាច់បារី តមស្រា :** ការជក់បារីជាកត្តាគ្រោះថ្នាក់បំផុតក្នុងការកើតជំងឺមហារីកសួត ហើយក៏មានទំនាក់ទំនងជិតស្និទ្ធជាមួយមហារីកប្រព័ន្ធរំលាយអាហារ មហារីកក្រពះ មហារីក បំពង់.ក មហារីកក្រពេញប្រូស្តាត មហារីកថ្លើម មហារីក.កស្បូន មហារីកសុដន់ ។ ដូច្នេះអ្នកជក់បារី គួរតែកាត់បន្ថយការជក់បារីពីពេលនេះទៅ ដើម្បីសុខភាព ។ ការផឹកស្រាច្រើនហួសក៏បណ្តាលឱ្យកើតជំងឺមហារីកមាត់ មហារីកថ្លើម មហារីកបំពង់.ក និងមហារីកប្រព័ន្ធរំលាយអាហារ ។ ដូច្នេះលោកអ្នកគួរតែកាត់បន្ថយ ដើម្បីសុខភាព ។

**៧. កាត់បន្ថយភាពតប់ប្រមល់ :** នៅពេលដែលយើងមានអារម្មណ៍តប់ប្រមល់វាធ្វើឱ្យមុខងារប្រព័ន្ធការពាររាងកាយធ្លាក់ចុះ និងបង្កើនអត្រាកើតជំងឺមហារីក ហើយសម្ពាធឈាមឡើងខ្ពស់ ដូច្នេះគួរតែធ្វើឱ្យអារម្មណ៍រីករាយ ទើបជាការប្រសើរ ៕

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

ការហ៊ឹកហាត់កងទ័ព និងត្រូវទទួលបន្ទុកដោយគណៈបេសកកម្មបារាំងដែលនៅក្រោមបង្គាប់ទីប្រឹក្សាបារាំងម្នាក់នៅអមរដ្ឋមន្ត្រីក្រសួងការពារប្រទេស ប៉ុន្តែផ្នែករតនាគារ.គយ.សន្តិសុខ.អន្តោប្រវេសន៍. ទូរគមនាគមន៍. អយស្ម័យយាន ។ល។ ត្រូវឋិតនៅក្នុងកណ្តាប់ដៃនៃរដ្ឋាភិបាលសហព័ន្ធឥណ្ឌូចិន ហើយត្រូវឡើង ទៅអគ្គស្នងការដ្ឋានឯព្រៃនគរ ។

ដោយសរុបទៅកិច្ចព្រមព្រៀងនេះគ្រាន់តែជារបៀបរបបគ្រប់គ្រងរបស់អាណាព្យាបាលបារាំងតែប៉ុណ្ណោះ ឥតមានអ្វីថ្មីជាដុំកំភួនដល់កម្ពុជាសោះឡើយ ។ ក្រោយមកគណៈកម្មការធ្វើកិច្ចសន្យាបានត្រូវគេប្រគល់ឱ្យទទួលបន្ទុកព្រាងរដ្ឋធម្មនុញ្ញមួយដើម្បីបន្ថយរបបគ្រប់គ្រងផ្តាច់ការជំនាន់ចាស់ឱ្យទៅជារបបប្រជាធិបតេយ្យខ្លះៗ។ គម្រោងការនេះបានធ្វើឱ្យសម្តេចមុនី រ៉េត ខឹងច្រឡោតតូងតាងនិងប្រឆាំងយ៉ាងខ្លាំងដោយយកលេសថា ប្រជារាស្ត្រខ្មែរមិនទាន់មានការអប់រំផ្លូវនយោបាយនៅឡើយទេ ហើយចង់យករបបផ្តាច់ការចាស់មកអនុវត្តវិញ ។


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

ដូច្នេះព្រះបាទ សីហនុ ក៏សព្វព្រះរាជហឫទ័យយល់ស្របផងដែរ ប៉ុន្តែយោបល់របស់សម្តេចមុនី រ៉េត នេះ បានត្រូវពួកបញ្ញវន្តមួយក្តាប់តូច ដែលទើបត្រឡប់ពីសិក្សានៅប្រទេសបារាំងថ្មីៗនោះជំទាស់យ៉ាងខ្លាំង ហើយបានស្នើសុំឱ្យបង្កើតសភាផ្សេងៗជ្រើសរើសយកសមាជិកដោយវិធីបោះឆ្នោត ដើម្បីធ្វើឱ្យរបបនយោបាយក្នុងប្រទេសមានដំណើរទំនងស្របនឹងលទ្ធិប្រជាធិបតេយ្យនៅបស្ចិមប្រទេសទាំងឡាយដែលមានរដ្ឋសភាត្រួតត្រារដ្ឋាភិបាល ។

ពួកបញ្ញវន្តមួយក្តាប់តូចនេះ ដោយអាងទៅលើកិត្យានុភាពរបស់ខ្លួនដែលបានទូលចំណេះពីប្រទេសបារាំង ហើយដែលបានចេះយ៉ាងស្ទាត់ជំនាញនូវពាក្យពេជន៍វាក្យស័ព្ទក្នុងលទ្ធិប្រជាធិបតេយ្យខាងបស្ចិមប្រទេសមែន ប៉ុន្តែពុំបានយល់បានដឹងនូវស្ថានការណ៍ស្រុកទេសយ៉ាងទូលំទូលាយទេ ទាំងពុំដែលមានការពិសោធន៍ក្នុងវិជ្ជានយោបាយនោះ ក៏បានប្រមូលផ្តុំយ៉ាងឆាប់រហ័សនូវពួកបញ្ញវន្តក្នុងប្រទេស គឺគ្រូ និងសិស្សានុសិស្សនៃវិទ្យាល័យស៊ីសុវត្ថិ ព្រមទាំងអ្នករាជការទាំងអស់ ជាពិសេសគឺបក្ខពួកអ្នកជាតិនិយម សឺន ង៉ុកថាន់ ។ ក្នុងចំណោមពួកនេះគេឃើញលោក ឈាន វ៉ម និងទ្រង់ ស៊ីសុវត្ថិ យុត្តិវង្ស បានលេចធ្លោឡើង ។

បន្ទាប់ពីបានដឹងអំពីសន្យាបារាំង-វៀតណាមដែលបានចុះហត្ថលេខានៅហាណូយកាលពីថ្ងៃទី៦មីនា ១៩៤៥ រវាង សាំងនីនី និងហូ ជីមិញ មកអ្នកនយោបាយនៅភ្នំពេញកាន់តែបញ្ចេញមតិទិទៀនព្រះករុណា -

តទៅលេខក្រោយ

# វិធីជួយឱ្យក្រចកដៃ ដុះលឿន និងមាំមួន

**សម្រាប់អ្នកដែលចង់បង្កើនម៉ូតក្រចក និងរចនាទៅតាមអ្វីដែលអ្នកចូលចិត្តដើម្បីបង្កើនភាពជឿជាក់ និងទាន់សម័យ ប៉ុន្តែក្រចកដៃរបស់អ្នកបែរជាដុះយឺតមិនដូចក្តីប្រាថ្នានោះ តើត្រូវធ្វើយ៉ាងណាដើម្បីកែលំអស្ថានភាពនេះ ?**

**-ប្រូតេអ៊ីន :** ដំបូងចាប់ផ្តើមយុទ្ធនាការបង្កើនការលូតលាស់របស់ក្រចកដៃដោយការបង្កើនប្រូតេអ៊ីនក្នុងរបបអាហារប្រចាំថ្ងៃ ដែលប្រូតេអ៊ីនទាំងនោះមានច្រើននៅក្នុងសាច់ ស៊ុត ទឹកដោះគោ និងគ្រាប់ធញ្ញជាតិ ។

**- មិនត្រូវខាំក្រចកដៃ :** មនុស្សមួយចំនួនតែងតែខាំក្រចកដៃនៅពេលមានភាពតប់ប្រមល់ក្នុងអារម្មណ៍នេះ គឺជាទម្លាប់ដ៏អាក្រក់មួយដែលការខាំក្រចកដៃនេះមិនត្រឹមតែប៉ះពាល់ដល់សុខភាពក្រចកប៉ុណ្ណោះទេ វាថែមទាំងប៉ះពាល់ដល់ភាពស្រស់ស្អាតរបស់ក្រចកផងដែរ ។ ដូច្នេះដើម្បីបំបាត់ទម្លាប់អាក្រក់នេះ ចូរទំពាស្ករកៅស៊ូ ឬធ្វើការងារអ្វីមួយដើម្បីបំភ្លេចការខាំក្រចកដៃនៅពេលប្រឈមនឹងភាពតប់ប្រមល់ទាំងនោះ ។

**- សម្អាតនិងបំប៉នសំណើម :** ដើម្បីជួយដល់ការរីកចម្រើននៃក្រចកដៃគឺការថែទាំវាឱ្យបានស្អាតបាត ព្រមទាំងបំប៉នជាតិសំណើមដល់ស្រទាប់ខាងក្រៅនៃក្រចកឱ្យបានញឹកញាប់ ។ ចូរប្រើប្រាស់ប្រេងបំប៉នសំណើមសម្រាប់ស្រទាប់ខាងក្រៅ និងលាបថ្នាំក្រចកមួយជាន់ ដើម្បីការពារក្រចកដៃចៀសវាងការប្រេះរលាត់ ។

**- ឈាមរត់ស្មើ :** តើអ្នកដឹងទេថា ឈាមដែលរត់ទៅកាន់ម្រាមដៃ គឺជាវិធីមួយដ៏មានប្រសិទ្ធភាពជួយធ្វើឱ្យក្រចកលូតលាស់បានលឿន ហើយប្រសិនបើអ្នកប្រើប្រាស់កុំព្យូទ័រវាយអត្ថបទប្រចាំថ្ងៃ ឬលេង Piano ឬមួយធ្វើការដោយប្រើប្រាស់ម្រាមដៃនោះ ក៏ជាវិធីមួយជួយឱ្យក្រចកបានលូតលាស់យ៉ាងឆាប់រហ័សផងដែរ ៕

